


THE KHMER POST
ISSUE 44 September 25th - October 09th 2009



# ទៅលេងហ្វីឡាកុំភ្លេចទៅញ៉ាំបុកល្ហុង និងសាច់អាំងនៅតាមផ្ទះខ្មែរ

**Philadelphia, ខ្មែរប៉ុស្តិ៍ : វ៉ាន់ាថ** •••សំរាប់អ្នកដឹងមិនជារឿងចម្លែកទេ ប៉ុន្តែសំរាប់អ្នកមិនដឹងទើបវាជារឿងចម្លែកប្លែកភ្នែក ហើយសប្បាយក្នុងអារម្មណ៍ទៀតផង ។ ក្នុងបេសកកម្មមួយទៅកាន់ក្រុង Philadelphia ដែលក្រោយពីចប់ភារកិច្ចការងារ មិត្តភ័ក្តិបាននាំអ្នកកាសែតយើងទៅកាន់ផ្ទះខ្មែរមួយដែលមានបើកហាងលក់នូវសាច់អាំង និងបុកល្ហុងក្នុងចំណោមផ្ទះខ្មែរ2-3កន្លែងទៀតដែល បានបើកមុខរបរមួយនេះនៅក្នុងសហគមន៍ជុំជិតដែលបងប្អូនខ្មែរ




តទៅទំព័រទី ១០

# ខ្មែរជំរុញឱ្យ ស.រ.អា សើរើពីសិទ្ធិមនុស្សនៅកម្ពុជា

•••លោកស្រី មូរ សុខហួរ ជាអ្នកតំណាងរាស្ត្រមកពីគណបក្ស សមរង្ស៊ី លោកស្រីបណ្ឌិត ហ្កេច ហ្កាឡាប្រូ ទាយិកាអង្គការក្រៅរដ្ឋាភិបាល Licadho និងលោក មឿន តុឡា ជានាយកកម្មវិធីមជ្ឈមណ្ឌលអប់រំច្បាប់ការងារសមាគមមកធ្វើសក្ខីកម្មនៅមុខសភា

តទៅទំព័រទី ០៦


អ្នកតំណាងរាស្ត្រ មូរ សុខហួរ ជួបជាមួយនឹងរដ្ឋមន្ត្រីក្រសួងការបរទេសអាមេរិកអ្នកស្រី Hillary Clinton (រូបថតផ្តល់ដោយវិមានកាពីតូល)

# ពិធីកាន់បិណ្ឌនៅ យូស្តុន តិចសាស់

*ដោយ : ខ្មែរប៉ុស្តិ៍*

•••ខ្មែរប៉ុស្តិ៍ បានទៅចូលរួមពិធីកាន់បិណ្ឌទី៩ នៅវត្តខេមរារាម ទីក្រុងយូស្តុន រដ្ឋតិចសាស់ កាលពីថ្ងៃអាទិត្យ ទី១៣ កញ្ញាកន្លងទៅនេះ ។ ថ្ងៃកាន់បិណ្ឌមាន១៤ថ្ងៃ មុនថ្ងៃប្រារព្ធពិធីបុណ្យភ្ជុំបិណ្ឌ ហើយពុទ្ធបរិស័ទជើងវត្ត បានដាក់វេនគ្នាមួយថ្ងៃម្នាក់ ឬមួយគ្រួសារ ដើម្បីប្រគេនចង្ហាន់ដល់ព្រះសង្ឃ ឬភ្ញៀវដែលមកធ្វើបុណ្យនាថ្ងៃនោះ ហើយវេរបច្ច័យទានបរិច្ចាគប្រគេនព្រះសង្ឃ ដើម្បីទ្រទ្រង់ជីវភាពព្រះសង្ឃ និងទីវត្តអារាម ។

វេនទី ៩ នេះ ជាវេនរបស់អ្នកស្រី ញ៉ែម សុមន្ថា ព្រមទាំងបុត្រ និងញាតិមិត្ត - ភ្ញៀវ និងញាតិមិត្តទាំងអស់បានមកចូលបុណ្យ ធ្វើបទនមស្សការ រាប់បាត តាំងពីម៉ោង១០ព្រឹក រួចហើយប្រគេនចង្ហាន់ព្រះសង្ឃ ជាមួយចង្ហាន់ដ៏ឈ្ងុយឆ្ងាញ់



លោក សូរ ម៉ូរ អ្នកស្រី ញ៉ែម សុមន្ថា (រូបឆ្វេង)

តទៅទំព័រទី ១១

# សេចក្តីអញ្ជើញទៅលេង ឡូវ្គាន់

*ដោយ : ខ្មែរប៉ុស្តិ៍* •••នៅថ្ងៃទី ៣ ខែតុលា ឆ្នាំ ២០០៩ វេលា ម៉ោង ១២ ដល់ម៉ោង ៤ល្ងាច នៅឡូវ្គាន់ លើ ផ្លូវ អូលយ៉ក ប្លូក 4900 សុបវ៉ាយ ឡូវ្គាន់ នឹងមានការជួបជុំតាំងពិពណ៌ធនធានក្នុងតំបន់ដ៏ធំមួយ ផ្តួចផ្តើមគំនិតដោយ Medical Wedge មានការចូលរួមដោយអង្គការជិត ៣០ ទៀត ។ សកម្មភាពនោះ មានឈ្មោះថា "Building The Bridge" ។ តទៅទំព័រទី ០៦

# មាស សែម បេក្ខជនសភាអាមេរិកាំងនៅរដ្ឋម៉ាសាឈូសែត

**Lowell, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា** ••• "ខ្ញុំចង់ក្លាយជាអ្នកច្បាប់ ជាអ្នកនយោបាយនៃសភាតំណាងរាស្ត្រអាមេរិកក្នុងគោលបំណងជួយជាតិខ្ញុំឱ្យមានការរីកចម្រើនមានសំឡេងក្នុងការកសាង និងអភិវឌ្ឍន៍សហគមន៍ខ្មែរ នៅលើទឹកដីអាមេរិក ។ នេះជាប្រយោគរបស់លោក មាស សែម កូនខ្មែរ-អាមេរិកាំង ដែលបានឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រនៃសភាអាមេរិក (U.S Congress) ប្រចាំតំបន់ទី5នៃរដ្ឋម៉ាហ្សាឈូសេត តទៅទំព័រទី ១៤


លោក មាស សែម



# ថ្ងៃបុណ្យនៃពួកប្រេត ឆាប់ចាប់ជាតិថ្មី

" វេលាម៉ោង4ទៀបភ្លឺសំឡេងទូងស្គរ និងការសូត្រធម៌ទំនួញប្រេតបានលាន់ទ្រហឹងចេញពីក្នុងវត្តយ៉ាងកងរំពងពេញផ្ទះអ្នកស្រុក ដែលរៀបរាប់ពីទង្វើល្អ និងអាក្រក់របស់បុគ្គលគ្រប់រូបកាលនៅរស់ លុះពេលស្លាប់ទៅកើតជាប្រេតអសុរកាយរងទុក្ខលំបាកវេទនាគ្មានអាហារទទួលទាន " ។

ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : គីម សារឿន

●●●ដោយសារតែជំនឿយ៉ាងមុតមាំបែបនេះហើយ ទើបពុទ្ធបរិស័ទជាសាច់ញាតិរៀបចំ បាយ សម្ល និងទេយ្យទានផ្សេងៗ សម្រាប់ប្រគេនព្រះសង្ឃដើម្បីឧទ្ទិសកុសលបុណ្យឱ្យជីដូនជីតារបស់ខ្លួនបានរួចផុតពីទុក្ខទោសផងទាំងពួង ហើយបានកើតនៅទីខ្ពង់ខ្ពស់វិញ ។

ក្នុងថ្ងៃកាន់បិណ្ឌរយៈពេល14ថ្ងៃនេះ ពុទ្ធបរិស័ទខ្មែរនៅទូទាំងប្រទេសបានស្រុះស្រួលគ្នាធ្វើបុណ្យគ្រប់វត្តមិនដែលខកខាននោះទេ សូម្បីអ្នកដែលរស់នៅទីឆ្ងាយក៏ត្រូវតែទៅធ្វើបុណ្យនៅស្រុកកំណើតដែរ ។ ជាពិសេសនៅថ្ងៃដាក់បិណ្ឌពុទ្ធបរិស័ទបានក្រោកពីព្រលឹមឡើងបោះបាយបិណ្ឌនៅជុំវិញព្រះវិហារដើម្បីឧទ្ទិសឱ្យសាច់ញាតិជាប្រេតទទួលទាន ពីព្រោះប្រេតខ្លាចពន្លឺភ្លើងទៀនខ្លាំងណាស់ ។

កាន់បិណ្ឌនេះពុទ្ធសាសនិកខ្មែរធ្លាប់ប្រារព្ធធ្វើតាំងពីសម័យកាលដ៏យូរលង់ គឺចាប់តាំងពីថ្ងៃ1រោច ដល់ថ្ងៃ14រោច ខែភទ្របទ ដើម្បីឧទ្ទិសកុសលផលបុណ្យឱ្យព្រលឹងបុព្វការីជន និងញាតិសន្តានដែលបានចែកឋាន ហើយស្លាប់ទៅកើតទីថោកទាប ។

ក្នុងពិធីបុណ្យនេះដែរ ពុទ្ធបរិស័ទជិតឆ្ងាយបានចែកវេនគ្នាធ្វើបុណ្យនៅតាមវត្តនីមួយៗរយៈពេល14ថ្ងៃ គឺអ្នកខ្លះទៅដេកកាន់បិណ្ឌ រៀបចំម្ហូបអាហារនៅឯវត្ត ចំណែកអ្នកខ្លះទៀតដែលមានផ្ទះនៅជិតវត្តធ្វើនៅផ្ទះរៀងៗខ្លួន ។

កាលណាថ្ងៃបុណ្យជិតមកដល់អាចារ្យគណៈកម្មការវត្តក៏បាន

តទៅទំព័រទី ១៩



អ្នកភូមិនាំគ្នាឧទ្ទិសកុសលឱ្យញាតិមិត្តដែលស្លាប់



ពួកយុវជននាំគ្នាបោះបាយបិណ្ឌ




# ការពិតនៅលើអ្វី ដែលគេហៅថា "សង្គ្រាមស៊ីវិល"

**ដោយ : ចៅ សេងអួ "អតីតរដ្ឋមន្ត្រីខ្មែរ"**

❖❖❖មកដល់សព្វថ្ងៃនេះប្រតិបត្តិការសឹកនៅក្នុងប្រទេសកម្ពុជាពីឆ្នាំ 1975 គេនៅតែនិយាយថា "ចម្បាំងស៊ីវិល" រវាងខ្មែរ និងខ្មែរក្នុងស្រុកដដែល ។ គេក៏នៅតែនិយាយថា មានការបំពានពីសំណាក់អាមេរិកាំងក្នុងឆ្នាំ 1970 ទៅលើប្រទេសខ្មែរដែលជាអ្នកត្រូវរងគ្រោះ ។

ការពិត គឺមានការរំលោភពីបរទេសយ៉ាងជាក់ស្តែងមកលើប្រទេសខ្មែរចាប់តាំងពីថ្ងៃ 29 មីនា ឆ្នាំ1970មែន ក៏ប៉ុន្តែការរំលោភនេះ ជាស្នាដៃរបស់ទ័ពកុម្មុយនិស្តយួនដែលបានចូលដោយសម្ងាត់ក្នុងទឹកដីខ្មែរតាំងពីដើមឆ្នាំ 1960 មកម្លេះ ។ ការរំលោភធ្វើឡើងដោយឥតបានដាក់កម្រិតជាឱសានវាទ និងគ្មានប្រកាសសង្គ្រាមទេ ។ ទ័ពយៀកកុង និងហាណូយបានដកបុគ្គលិកទូតទាំងអស់ពីភ្នំពេញថ្ងៃទី27 ខែមីនា ឆ្នាំ1970 ។

យៀកកុង និងហាណូយបានប្រកែកទាំងបំពានទៅលើការពិតនៃកម្លាំងទ័ព និងជម្រករបស់ខ្លួននៅស្រុកខ្មែរ ទោះជាពេលនោះ សម្តេច សីហនុ បានបរិហារចង្អុលបង្ហាញនៅឆ្នាំ 1968-1969 ក៏ដោយ ។ "កុម្មុយនិស្តយួនលួចចូលស្រុកយើងច្រើនឡើងៗ ខ្ញុំមិនអាចលាក់បានទៀតទេ ដល់ពេលដែលត្រូវឱ្យមតិអន្តរជាតិដឹងឮហើយ" សម្តេច សីហនុ បានប្រកាសក្នុងសន្និសីទកាសែតនៅភ្នំពេញ នៅថ្ងៃទី 28 មីនា ឆ្នាំ 1969 (ដកស្រង់ពីឯកសារពីការឈ្លានពានរបស់យៀកកុង និងហាណូយលើ ស្រុកខ្មែរបោះផ្សាយដោយក្រសួងឃោសនាការនៅភ្នំពេញ 1970) ។

បើគេពិនិត្យលើថ្ងៃខែនៃព្រឹត្តិការណ៍តាមលំដាប់លេខរៀងនៃការកើតមាននាពេលនោះ កាលបរិច្ឆេទនេះចង្អុលឱ្យឃើញយ៉ាងច្បាស់ថាគ្មានការរំលោភបំពាន ឬឈ្លានពានពីសំណាក់អាមេរិកាំងនៅឆ្នាំ 1970 ទេ ។ ព្រោះថា គឺនៅថ្ងៃទី 30 ខែមេសា ឆ្នាំ 1970 គឺមួយខែក្រោយពីការឈ្លានពានរបស់យួនកុម្មុយនិស្តនោះទេ ទើបបានទ័ពអាមេរិកាំង និងទ័ពយួនខាងត្បូងចូលធ្វើអន្តរាគមន៍មកលើស្រុកខ្មែរ ហើយមានបំណងតែមួយគត់ គឺបំផ្លាញជម្រករបស់យួនកុម្មុយនិស្ត ដែលតាំងនៅខាងកើតស្រុកខ្មែរ ។

**តទៅទំព័រទី ១៨**






# ចាប់ចងប៉ងសម្លាប់ តែភ្លាត់ចំណាប់តាំងជាថ្មីវិញ



***ដោយ : ម៉ម ឃិន***

សម័យថ្ងៃមួយមេក្រុងយក្ស
ត្រួតអស់មន្ត្រីក្រុមយក្សា
មេយក្សក្តោបក្តាប់អស់ការងារ
ក្រៅពីក្រុមយក្សជាគូដៃ
ថ្ងៃមួយដៃគូត្រូវគ្រោះថ្នាក់
ដោយត្រូវសរជ័យបាញ់ទំលុះ
មេរងក្រុងយក្សបានក្សិណក្ស័យ
គិតថាពេលនេះអញត្រូវបែក
ពីព្រោះមានយក្សខ្លះចិត្តក្បត់
អញមិនទុកវារស់ប្រងើយ
គិតស្រេចមេយក្សចេញបញ្ជា
ចាប់យក្សចិត្តក្បត់តាមបញ្ញត្តិ
ដកអស់បុណ្យសក្តិ និងអំណាច
ហើយត្រូវកាត់ទោសតាមទម្រង់
យក្សក្បត់ភ័យណាស់ ព្រោះកំហុស
ត្រូវទោសធ្ងន់ណាស់ប្រាកដក្ស័យ
គិតស្រេចយក្សក្បត់សូមបន់ស្រន់
ខ្លួនបានសាងទុកពីអតីត [1]
ពេលនោះពួកយក្សមុខក្រហម
ធ្លាប់ជួយធ្លាប់ផ្តល់ក្តីសង្គ្រោះ
ដូច្នេះ ពួកយក្សមុខក្រហម
ឱ្យមេក្រុងយក្សមានចិត្តថ្នម
ហើយត្រូវតំកើងឱ្យមានមុខ
មន្ត្រីយក្សមួយដោយកំណត់
ដោយខ្លាចពួកយក្សមុខក្រហម
ដោះលែងយក្សក្បត់រួចគ្រោះថ្នាក់
បានឡើងធ្វើធំដូចពីមុន
យក្សមុខក្រហមធ្លាប់បញ្ចេញ
ទើបមេក្រុងយក្សសែនត្រេកអរ
មន្ត្រីយក្សថ្មីធ្លាប់ស្វែងរក
ឱ្យធ្វើជំនួសយក្សដែលក្បត់
មេក្រុងយក្សអរពន់ពេកក្រៃ
មេក្រុងយក្សពិតជាមេខ្លាំង
ជាមេយក្សមានឫទ្ធិតេជោ

ជាមេផុតថ្នាក់ក្នុងរដ្ឋា
មានឫទ្ធិចេស្តាខ្លាំងក្លាក្រៃ ។
គ្មានឱ្យយក្សណាផ្សេងដទៃ
ឱ្យជួយរាល់ថ្ងៃជាជំនួស ។
រហូតដល់ធ្លាក់ខ្លួនស្លាប់ស្មោះ
ព្រះឥន្ទ្របាញ់ចុះពីលើមេឃ ។
មេក្រុងយក្សភ័យយ៉ាងអនេក
ក្បាលជាចំណែកមិនខានឡើយ ។
ប្រុងតែធ្វើគត់អញយូរហើយ
យក្សមិនកន្តើយត្រូវកំចាត់ ។
ទៅយក្សបរិវា ដោយសម្ងាត់
ហើយត្រូវបំបាត់កុំបង្អង់ ។
ក្លាយជនតូចតាចដាក់ក្នុងទ្រុង
ទោសក្បត់មេក្រុង អសុរី ។
បានប្រព្រឹត្តខុសចិត្តអប្រិយ៍
បើសិនដល់ថ្ងៃត្រូវស្លាប់ពិត ។
បើខ្លួនមានបុណ្យជួយជីវិត
ហើយតែងប្រព្រឹត្តចិត្តត្រង់ស្មោះ ។
ជាយកព្រៀងព្រមរួមរំដោះ
ឱ្យមេយក្សរស់បានធ្វើធំ ។
ចេញមកផ្តល់ព្រមពាក្យណែនាំ
ដល់យក្សដែលព្រមថាខ្លួនក្បត់ ។
នាទីចាត់ទុកជាប្រាកដ
ដឹកនាំក្នុងរដ្ឋនៃក្រុងយក្ស ។
មេក្រុងយក្សព្រមដោយស្មោះស្ម័គ្រ
ក្លាយជាខ្លួនយក្សចិត្តល្អវិញ ។
ដោយសារតែគុណយ៉ាងពោរពេញ
លើក្រុងយក្សមិញពីមុនមក ។
ចិត្តសែនសាទរ ហើយនាំយក
ជោគជ័យមុនមកមានថ្មីដៃ ។
ឥឡូវកំណត់តំណែងថ្មី
យក្សរួមដៃគ្រងរាជត ។
មេចេះតតាំងត្រឹមត្រូវល្អ
បារមីពេញពោររៀងរហូតអើយ ៕

(1) អានថាអជិត

# មាតិការឿង

# វិភាគនយោបាយ សំណាងឈ្នះរបស់សម្ព័ន្ធភាពដើម្បីផ្លាស់ប្តូរនៅកម្ពុជា

**ដោយ : ពិន សំខុន**


លោក ពិន សំខុន

●●●សម្ព័ន្ធភាពរវាងគណបក្សប្រឆាំងពីរដ៏សំខាន់នៅកម្ពុជា គឺគណបក្ស សម រង្ស៊ី និងគណបក្ស កឹម សុខា បានផ្តល់សេចក្តីសង្ឃឹមតែមួយគត់ដល់វាសនាពលរដ្ឋខ្មែរឱ្យមានជីវិតប្រសើរ ចាប់តាំងពីឆ្នាំ ១៩៧០ មក ។ បទវិភាគដែលបន្តតាំងពី ២លេខមុនមក គឺគ្រាន់តែចង់ពិគ្រោះជាមួយលោកអ្នកអាន "ខ្មែរប៉ុស្តិ៍" ក្នុងការសម្លឹងទៅអនាគតនៃនយោបាយកម្ពុជា ថាតើសម្ព័ន្ធភាពនៃគណបក្សពីរនេះ អាចនឹងផ្តល់ការផ្លាស់ប្តូរទៅជាប្រសើរបានដែរ ឬទេ ? គឺសម្លឹងទៅរករបស់ដែលពុំទាន់មានរូបរាងពិតប្រាកដនៅឡើយតែប៉ុណ្ណោះ ។

**៦- សង្ឃឹមលើសន្យា** : ជាទូទៅអ្នកនយោបាយ ត្រូវសន្យាបង្ហាញការគូសវាសអនាគតសង្គម ដើម្បីទាក់ទាញជំនឿពីប្រជាពលរដ្ឋឱ្យប្រមូលមកខាងខ្លួនយកជាកម្លាំង ។ មានមនុស្សជាច្រើនបានផ្តល់ជំនឿទៅលើអ្នកនយោបាយដែលពូកែនិយាយ ពូកែសន្យា ពូកែដោះស្រាយ តែមនុស្សទាំងនោះ ច្រើនទទួលការខកចិត្តដោយអ្នកនយោបាយដែលខ្លួនពេញចិត្តពេលមុននោះ ពុំបានធ្វើឱ្យដូចជំនឿដែលខ្លួនបានផ្តល់ឱ្យនោះទេ ។ បើគេសន្យា គឺទាមទារឱ្យមានការធ្វើស្របនឹងពាក្យទៅអនាគតក៏ដូចអតីតកាល-ជំនឿទៅលើអនាគតដោយគ្មានផ្អែកទៅលើទង្វើនៃអតីតកាល គឺជាការដាក់ជីវិតទៅលេងល្បែងផ្សងព្រេងមួយដែលក្រឡាចាញ់ ក្រឡាក្រ ក្រឡាអស់សង្ឃឹមនៅរង់ចាំអ្នកជំនឿសន្យានោះគ្រប់ជំហាន ។ តើនរណាអាចទាយថា អ្នកសន្យានោះនឹងបោកប្រាស់ខ្លួនបានទៅអនាគត? ឆ្លើយថា អាចដឹងបាន ដោយយោងតាមការស្គាល់ពីអតីតកាលនៃបុគ្គលដែលហ៊ានសន្យានោះថា មិនដែលបោកប្រាស់អ្នកណាម្នាក់នោះទេ ការខកចិត្តអាចបន្ថយបានច្រើន ។

**៧- សង្ឃឹមរបស់អ្នកជឿ** : មនុស្សដែលផ្តល់ជំនឿទៅលើអ្នកធ្វើនយោបាយជាច្រើនតែងដាក់ខ្លួនថា ខ្លួនធ្វើអ្វីមិនបានទេ ព្រោះម្នាក់ឯងដូច្នេះ ត្រូវតែស្វែងរកអ្នកចេះ អ្នកខ្លាំងពូកែឱ្យផ្តល់ជីវភាពប្រសើរដល់ប្រទេសខ្លួន ដល់គ្រួសារខ្លួន និងដល់រូបខ្លួនឯង ។ តែរបៀបដែលគេសម្លឹងមើលអ្នកចេះ គឺអ្នកមានតំណែងធំក្នុងរដ្ឋពុករលួយ អ្នកមានលុយច្រើននៅប្រទេស ដែលមានតែអ្នកក្រ គឺអ្នកដែលពូកែ គឺអ្នកដែលចេះប្រើប៉ូលិស ឬកងទ័ព អ្នកដែលពូកែ គឺអ្នកដែលហ៊ានជេប្រមាថ ។ គិតរបៀបនេះ គេអាចទទួលបានទៅអនាគតនូវអ្នកដឹកនាំដែលគិតពីផលប្រយោជន៍ផ្ទាល់ខ្លួន ឬក្រុមគ្រួសារខ្លួន ទោះជាខ្លួនទទួលសញ្ញាប័ត្រច្រើន ឬក៏មានតំណែងសំខាន់ប៉ុណ្ណាក៏ដោយ - ដូច្នេះគេត្រូវតែស្វែងរកអ្នកចេះដែលគេដឹងថា អាចព្យាបាល ឬដោះស្រាយបញ្ហាពិតប្រាកដជូនអ្នកបានរកអ្នកពូកែដែលយកអំណាចពីជំនឿរបស់អ្នកមកបំរើពលរដ្ឋដូចរូបអ្នកជាដើមបាន ។ ជីវិតរបស់អ្នកជឿពុំអាចយកទៅដាក់ឱ្យផ្សងព្រេងបានទៀតទេ គេត្រូវ " ស្វែងរក " អ្នកធ្វើដែលអាចធ្វើបាន បានន័យថា " ជំនឿ " តម្រូវឱ្យជឿ " អ្នកធ្វើ " ដូចគ្នា ។ បើអ្នកមិនចង់ក្រ បើអ្នកមិនចង់ខ្សោយ បើអ្នកមិនចង់ខ្លាច ត្រូវស្វែងរកមនុស្សរបស់ខ្លួនដោយខំប្រឹងប្រែង ហើយបើគ្មានទេ គេត្រូវបង្កើតឱ្យមានមួយ ។ ក្នុងចំណោមមនុស្សដឹកនាំនយោបាយកម្ពុជា ៥រូប គឺអតីតព្រះមហាក្សត្រនរោត្តម សីហនុ - លោក ហ៊ុន សែន បច្ចុប្បន្ននាយករដ្ឋមន្ត្រី - ទ្រង់នរោត្តម រណឫទ្ធិ លោក សម រង្ស៊ី - លោក កឹម សុខា អ្នកទាំង៥រូបនោះសុទ្ធតែបានបង្ហាញនូវអតីតភាពដល់មនុស្សខ្មែរជាច្រើនគ្មានចន្លោះ បើគេសួរថា តើនរណាមួយដែលអ្នកជឿថា នឹងផ្តល់ជីវភាពប្រសើរដល់អ្នក និងគ្រួសារអ្នកផ្តល់ការគ្រប់គ្រងប្រទេសស្មើមុខនឹងគេបានផ្តល់សេរីភាពដល់សង្គមខ្មែរបាន ? នៅពេលដែលអ្នកប្រៀបធៀបមនុស្សដឹកនាំនោះទៅនឹងអ្វីដែលគេអាចធ្វើបាន អ្វីដែលជាអតីតកាលរបស់គេ អ្នកនឹងអាចចង្អុលឈ្មោះមួយ ឬពីរ ដែលស្របទៅនឹងសេចក្តីជំនឿរបស់អ្នក ហើយត្រូវខិតខំឱ្យឈ្មោះនោះ ក្រុមនោះលេចចេញធ្លោពីសេចក្តីសង្ឃឹមនោះឡើង - បើគ្មានឈ្មោះនោះទេ អ្នកត្រូវស្វែងរក ដោយមិនទុកឱ្យទ្រគាកស្លាប់ស្លូកទេ ។

**៨- សង្ឃឹមលើចរន្តផ្លាស់ប្តូរ** : រស់នៅពិបាកច្រើនឆ្នាំ តម្រូវឱ្យពលរដ្ឋខ្មែរ ចង់ផ្លាស់ប្តូរចាប់តាំងពីឆ្នាំ ១៩៧០ មក ចង់ផ្លាស់ប្តូរសង្គមខ្មែរតែងជួបការលំបាកចេះតែធ្ងន់ធ្ងរទៅៗ ។ ចរន្តផ្លាស់ប្តូរក្នុងពិភពលោកបានបោះដៃឱ្យកម្ពុជានៅឆ្នាំ ១៩៩៣ ដោយ អ.ស.ប តែខ្មែរបានឱ្យជំនឿទៅលើមេដឹកនាំ ដែលទទួលការបីបាច់ថ្នាក់ថ្នមពីរបបកុម្មុយនីស្ត ចិន និងយួន- ក្រុមលោក សម រង្ស៊ី និង កឹម សុខា ក៏ធ្លាប់កសាងជំនឿយ៉ាងប្រឹងប្រែងនាពេលនោះដែរ ។ យ៉ាងឆាប់រហ័ស ភាពមិនដូចគ្នានៃ សម រង្ស៊ី និង កឹម សុខា ជាមួយនឹងនយោបាយដឹកនាំជាតិ នាអំឡុង ២០ឆ្នាំចុងក្រោយនេះ តម្រូវឱ្យ សម រង្ស៊ី ឆ្នាំ ១៩៩៤ មុនគេ បន្ទាប់មកឆ្នាំ ២០០៧ មាន កឹម សុខា ត្រូវបង្កើតចរន្តថ្មីទៀត (ព្រោះគ្មានពីមុនមក) ដាក់ឱ្យពលរដ្ឋខ្មែរជ្រើសរើស ។ ពាក្យសន្យាជាច្រើននៃអ្នកដឹកនាំចុងក្រោយ ត្រូវបានផ្សព្វផ្សាយ ហើយផ្ទុយទៅនឹងនយោបាយដឹកនាំកម្ពុជាបច្ចុប្បន្នស្ទើរតែទាំងអស់ ដែលតម្រូវឱ្យអ្នកទាំងពីរចង់ឱ្យមានការផ្លាស់ប្តូរតែរៀងៗខ្លួន រហូតដល់មានគំនិតថ្មីមួយទៀត ដែលកំពុងហោះហើររកកន្លែងចុះចតមិនទាន់បាន គឺជា "សម្ព័ន្ធអ្នកប្រជាធិបតេយ្យ ដើម្បីផ្លាស់ប្តូរ" ។ ដោយយោងទៅតាមបទវិភាគនេះ ពលរដ្ឋត្រូវតែទទួលនូវការជ្រើសរើសមួយដោយប្រឹងប្រែង ដោយផ្អែកទៅលើអតីតកាលនៃមេដឹកនាំទាំងចាស់ ទាំងថ្មី ។ ការផ្លាស់ប្តូរដែលមានគ្រប់ការស្ទង់មតិរបស់ពលរដ្ឋខ្មែរ គឺបំបាត់ភាពក្រីក្រ - យុត្តិធម៌ក្នុងសង្គម - ឯករាជ្យភាព និងភាពជឿនលឿនក្នុងប្រទេស តើណាមួយដែលពលរដ្ឋអាចជឿបានទៅថ្ងៃអនាគត ? ព្រោះនេះគឺជាពាក្យសន្យានៅគ្រប់ការឃោសនានានានៅកម្ពុជា ជារៀងរាល់ថ្ងៃ ហើយវត្ថុបំណងទាំងនោះនៅពុំទាន់បានធ្វើនៅឡើយទេ ។ សេចក្តីសង្ឃឹមលើយុវជនខ្មែរ គឺចរន្តនយោបាយឈ្នះទី១ សេចក្តីសង្ឃឹមថា ឈ្នះក្រីក្រ ជាចរន្តឈ្នះទី២ - សេចក្តីសង្ឃឹមលើរបបគំរូលោកសេរី ជាចរន្តឈ្នះលេខ៣ គណបក្សនយោបាយណាដែលជាតំណាងឱ្យឧត្តមគតិទាំងនោះ ហើយធ្វើឱ្យពលរដ្ឋភាគច្រើនជឿលើខ្លួនបាន អ្នកនោះនឹងឈ្នះ ។ នៅមានសំនួរសំខាន់មួយទៀត តើលោក សម រង្ស៊ី និងលោក កឹម សុខា រួមគ្នាអាចមានលក្ខណៈសម្បត្តិ និងមធ្យោបាយគ្រប់គ្រាន់ហើយឬនៅសម្រាប់ដល់ពេលឈ្នះ **តទៅទំព័រទី ១៦**


## The Khmer Post Directory

### East Coast Publication

Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

**Advertising**
**Marketing Manager:**
**Sabane Thach**
**Phone : 267-253-3947**
**Email : sabane.thach@gmail.com**

### West Coast Publication

RegionalEditor : Sovannara Meach
Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith
**Phone: (562) 313-2129**
**Email: sovannara04@yahoo.com**

# Portland Khmers host a public forum for sharing and healing.

**By Tiara Delgado, Khmer Post writer**

..."It's a way of preserving culture and history. If we don't ... it will die with the older generation. We are trying to put pieces together for the young generation," says Sokpak Bhell, a Portland resident and mother of a 2 -year old daughter. Sokpak was herself 2 years old when the Khmer Rouge took over Cambodia. "I want my kids to embrace Khmer culture and have a solid foundation to know where their roots came from." Today, Sokpak is a social worker and volunteer for Cambodian-America n Association of Oregon (CACO). She was among a few dozen Cambodian-American survivors that attended the "Collective Sharing and Healing Forum- Khmer Rouge Tribunal Public Forum II at Portland State University on August 15.

CACO hosted the first K.R. Forum in April, 2007. This year's event was just as emotional as the first one, yet also inspiring and educational. This year's event included a documentary film, panel discussion with Khmer authors, dance performance, presentations by academic experts, and an open microphone for survivors' testimonies.

"Oral History Project" a documentary produced by Spin Films, was a highlight of the day. The film gave Khmer-American youth the chance to listen to their parents explain what they experienced during the Killing Fields. For some of the youth it was the first time they heard their parents' stories in detail. Dr. Patricia Schechter, professor of US History at Portland State, was very moved by the documentary. "It was an amazing balance between tender human emotion and an important story of remembering," she said of the film.





Conversations with Khmer authors showcased five survivors who put pen to paper to tell their stories. Authors: Theary Seng (A Daughter of the Killing Fields), Sichan Siv (Golden Bones), Vanmealy Touch (Behind Cam-bodia's Killing Fields", Ronnie Yimsut (Journey into Light) and Kilong Ung (Golden Leaf) created a panel to discuss how writing was part of their healing process.

"The number one question I get asked - Why does the legal process go so slow?" stated Dr. Craig Etcheson who had just flown in from Cambodia. Etcheson, the lead investigator of the Prosecu-tion at the Extraordinary Chambers in the Courts of Cambodia (ECCC) had also presented at the first Portland forum in April 2007. He discussed each of the five Khmer Rouge leaders being held in custody and what crimes they were being charged. He explained that the jurisdiction of the tribunal was limited to the top Khmer Rouge leaders and "those most responsible." Etcheson said," We (the ECCC) may not be able to prosecute the person who killed your family member. But- by God- we're going after the person who told him to do it!" The audience applauded.

The full day event, which began at 9am with violin music by Aaron Meyer was moderated by Emily Harris of Oregon Public Broadcasting. It ended by 6pm after presentations by Dr. Leakhana Nou (CSU Long Beach), Dr. Jim Boehnlein (Oregon Health Science University) and Dr. Wendy Freed (USC). The academic experts discussed the psycho-emotional consequences of genocide, such as Post Traumatic Stress Disorder (PTSD). The graceful CACO dance performance added an element of cultural artistry to the emotionally charged day.

CACO states that they hope this forum will foster a process of justice, peace, healing and reconciliation through dialogue and open discussion. They want the forum to inform and educate the general public about the trauma of genocide. Furthermore, CACO believes this forum can help its community members to cope with individual and collective past trauma by dealing with it openly, directly and honestly.

For more information about CACO and upcoming events in Portland, please visit www.cacoregon.org.

## (តមកពីទំព័រទី ០១) ខ្មែរជំរុញឱ្យ ស.រ.អា ស៊ើបអង្កេតសិទ្ធិមនុស្ស ...

អាមេរិកាំង ជាមួយគណកម្មាធិការផ្នែកការពារសិទ្ធិមនុស្ស Tom Lantos ដែលជាស្ថាប័នសភាធ្វើការពិនិត្យសិទ្ធិមនុស្សជុំវិញពិភពលោក កាលពីថ្ងៃទី ១០ ខែកញ្ញា ឆ្នាំ ២០០៩ ។

**Long Beach, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

●●●ថ្លែងទៅកាន់មនុស្សជាង100នាក់នៅទីក្រុងខ្មែរ Long Beach កាលពីចុងសប្តាហ៍កន្លងទៅនេះ លោកស្រី មូរ សុខហួរ អ្នកតំណាងរាស្ត្រគណបក្ស សម រង្ស៊ី បានមានប្រសាសន៍ថា រដ្ឋាភិបាល និងសភាអាមេរិកត្រៀមរៀបចំគណៈកម្មការរបស់ខ្លួនក្នុងដំណើរបេសកកម្មទៅកាន់ប្រទេសកម្ពុជា បំណងតាមដានស្វែងយល់ពីបញ្ហាសិទ្ធិមនុស្សនៅកម្ពុជាឱ្យបានប្រាកដប្រជា ដើម្បីស៊ើបអង្កេតក្នុងការដាក់សម្ពាធនូវរាល់លក្ខខណ្ឌនានាទៅនឹងការផ្តល់ជំនួយឱ្យដល់កម្ពុជា ។

លោកស្រី មូរ សុខហួរ និយាយថា ការជួបសវនាការជាមួយនឹងរដ្ឋមន្ត្រីក្រសួងការបរទេសអាមេរិកអ្នកស្រី Hillary Clinton នៅវិមានរដ្ឋាភិបាល Washington, DC នោះ រដ្ឋមន្ត្រីការបរទេសរូបនេះបានសម្រេចបង្កើតស្ថាប័នរដ្ឋមួយដែលមានឯកអគ្គរដ្ឋទូតស្ត្រីម្នាក់ ក្នុងការទទួលបន្ទុកកិច្ចការស្ត្រី និងកុមារសំរាប់ឃ្លាំមើលពីបញ្ហាសិទ្ធិមនុស្ស និងការរំលោភបំពានទៅលើស្ត្រីភេទ និងកុមារ ។ ដែលស្ថាប័នមួយនេះគ្រោងនឹងចុះទៅកាន់ប្រទេសកម្ពុជានៅខែវិច្ឆិកាខាងមុខនេះ ដើម្បីពិនិត្យមើលនូវរាល់ករណីដែលទាក់ទងទៅនឹងការរំលោភបំពានសិទ្ធិមនុស្ស និងលទ្ធិប្រជាធិបតេយ្យដែលតែងតែកើតមានចំពោះប្រជាពលរដ្ឋ ស្លូតត្រង់ អ្នកតស៊ូមតិដើម្បីសេរីភាព អ្នកកាសែត និងក្រុមគណបក្សប្រឆាំងជាដើម ដែលរដ្ឋាភិបាល ហ៊ុន សែន តែងតែបង្ក្រាបដោយការសម្លាប់ ឬចាប់ដាក់គុកដោយយកអំណាចតុលាការធ្វើជាអន្ទាក់ ។

ស្របនឹងការបង្កើតស្ថាប័នខាងលើនេះ របស់រដ្ឋាភិបាល Obama នោះ នៅវិមានសភាអាមេរិកគេឃើញថា គណៈកម្មការសិទ្ធិមនុស្សនៃសភាអាមេរិកក៏ត្រៀមខ្លួនរៀបចំគណៈប្រតិភូសភាជាន់ខ្ពស់មួយក្រុមគ្រោងទៅកាន់ប្រទេសកម្ពុជាក្នុងបំណងស្វែងរកការពិតពីការអនុវត្តនៃការគោរពលទ្ធិប្រជាធិបតេយ្យ និងបញ្ហាសិទ្ធិមនុស្សដើម្បីវិភាគ និងវាយតម្លៃជាមួយ



អ្នកស្រី មូរ សុខហួរ.លោកស្រីបណ្ឌិត ហ្គេច ហ្គាឡាប្រូ.លោក មឿន តុឡា ថ្លែងនៅក្នុងវិមានកាពីតូលសភាអាមេរិក



បងប្អូនខ្មែរចូលស្តាប់អ្នកតំណាងរាស្ត្រ មូរ សុខហួរ

របាយការណ៍របស់អង្គការអន្តរជាតិធំៗ ដែលបាននិយាយថា ប្រទេសកម្ពុជាកំពុងតែដំណើរការថយក្រោយនៃការគោរពសិទ្ធិមនុស្ស ដែលការកាន់អំណាចដោយបុគ្គលម្នាក់ជានាយករដ្ឋមន្ត្រីដែលគ្មាននិរន្តភាពឯករាជ្យនៃអំណាចនីតិទាំង 3 គឺអំណាចនីតិប្រតិបត្តិ អំណាចនីតិបញ្ញត្តិ និងអំណាចតុលាការនោះ ។

អ្នកតំណាងរាស្ត្រ មូរ សុខហួរ ក្នុងឱកាសថ្លែងទៅកាន់សមាជិកសភាអាមេរិកកាលពីចុងសប្តាហ៍កន្លងទៅនេះ ដោយបានបង្ហាញពីការស្នើឱ្យរដ្ឋាភិបាលសហរដ្ឋអាមេរិកសហការជាមួយមេដឹកនាំប្រទេសអ្នកកាន់លទ្ធិប្រជាធិប-តេយ្យដទៃទៀតរួមគ្នាបង្ហាញជំហរឱ្យបានច្បាស់លាស់ចំពោះបញ្ហារំលោភបំពានផ្នែកសិទ្ធិមនុស្ស និងការរំលោភសេរីភាពនៃការបញ្ចេញមតិនៅកម្ពុជាបច្ចុប្បន្ន ។

ថ្លែងប្រាប់វិទ្យុអាស៊ីសេរី ឯកអគ្គរដ្ឋទូតខ្មែរប្រចាំសហរដ្ឋអាមេរិកលោក ហែម ហេង បាននិយាយថា កម្ពុជាកំពុងតែមានភាពជឿនលឿននៃការពង្រឹង និងពង្រីកសេរីភាព និងសិទ្ធិមនុស្សក្នុងប្រទេស ដោយបង្ហាញថា សព្វថ្ងៃកម្ពុជាមានអង្គការសង្គម ស៊ីវិលរាប់ពាន់ ក្នុងនោះគ្រាន់តែអង្គការសិទ្ធិមនុស្សអន្តរជាតិក៏មានមិនតិចជាង 10អង្គការដែរ ដូចជា NDI និង IRI រួមទាំងអង្គការសិទ្ធិមនុស្សរបស់សហប្រជាជាតិ UN ផងដែរ ។ ហើយស្តីពីសេរីភាពខាងផ្នែកព័ត៌មាន កម្ពុជាមានកាសែត និងទស្សនាវដ្ដីជិត 600, ស្ថានីយវិទ្យុ40 និងស្ថានីយដល់លទៅ7ប៉ុស្តិ៍ ។ ក្នុងចំណោមប្រព័ន្ធផ្សព្វផ្សាយព័ត៌មានបរទេសដែលកំពុងប្រតិបត្តិការនៅកម្ពុជា គេសង្កេតឃើញថា មានវិទ្យុសម្លេងសហរដ្ឋអាមេរិក (V.O.A), វិទ្យុអាស៊ីសេរី (RFA) និងទូរទស្សន៍ CNN ជាដើម ។ លោកឯកអគ្គរដ្ឋទូតខ្មែររូបនោះបានបញ្ជាក់ថា "យើងដឹងស្រាប់ហើយថា នៅកម្ពុជា សព្វថ្ងៃនេះសិទ្ធិមនុស្សក្តី ទាំងប្រជាធិប-តេយ្យក្តី ទាំងនីតិរដ្ឋក្តី គឺតាំងពីឆ្នាំ 1993 ដែលយើងចាប់ផ្តើមទទួលលទ្ធិប្រជាធិបតេយ្យ មករាជរដ្ឋាភិបាលក៏ដូចជាប្រជាជនទាំងអស់ គឺគោរពណាស់ចំពោះរដ្ឋធម្មនុញ្ញរបស់យើង ប៉ុន្តែគណបក្សប្រឆាំងនៅតែចោទប្រកាន់រាជរដ្ឋាភិបាលបានរំលោភសិទ្ធិមនុស្ស គឺជាការបង្កាច់បង្ខូចការអនុវត្តប្រជាធិបតេយ្យ អនុវត្តសិទ្ធិមនុស្សនៅកម្ពុជា " ៕

## (តមកពីទំព័រទី ០១) សេចក្តីអញ្ជើញទៅលេង...

ការតាំងពិពណ៌ ការសម្តែងតន្ត្រី ការបង្ហាញម៉ូតនៃវប្បធម៌តំបន់ បង្ហាញសេដ្ឋកិច្ច ឬសុខភាព ឬសង្គម នៅក្នុតំបន់ដែលមានខ្មែរច្រើនរស់នៅ គឺចង់បង្ហាញធនធានជាច្រើនមុន ច្រើនសណ្ឋានដែលនៅជុំវិញគ្រួសារខ្មែរ និងសាសន៍ឯទៀត ដើម្បីឱ្យអ្នកទាំងនោះ អាចដឹងថា ធនធានរបស់ខ្លួននៅទីណា មានអ្នកណាជាអ្នកគ្រប់គ្រង ដែលទាំងអស់គ្នាអាចប្រើប្រាស់បាន ។ កម្មវិធីនេះមានបំណងបន្តភ្ជាប់ធនធានសង្គម ទៅនឹងពលរដ្ឋដែលរស់នៅជុំវិញ ដូចគ្នានឹងគំនិតសង់ស្ពានជូនពលរដ្ឋ ឡូត្កាន់ ដូច្នោះដែរ ។

តំណាងអង្គការ សហគមន៍ ដូចជា សហគមន៍ខ្មែរ នឹងបង្ហាញជូនរបាំបូរាណខ្មែរ, អង្គការគាំទ្រគ្រួសារខ្មែរ (Family Support Group) និង $E_3$ ក៏នឹងបង្ហាញសំលៀកបំពាក់ទំនៀមទំលាប់ខ្មែរ និងស្នាដៃយុវជនខ្មែរ ។ មន្ត្រីក្រុងជាច្រើនរូបនឹងមកជួបពលរដ្ឋរបស់ខ្លួន- រង្វាន់ដ៏ច្រើន និងម្ហូបចំណីដ៏ឈ្ងុយឆ្ងាញ់នឹងនាំមកជូនក្រុមគ្រួសារ ដើម្បីលើកទឹកចិត្ត អបអរដល់ការជួបជុំគ្នា ដែលមានធ្លាប់មាននេះ ។ ដូច្នេះ បើបងប្អូនខ្មែរ មានបំណងចង់បង្ហាញពីស្នាដៃរបស់ខ្លួនដែរ សូមទាក់ទងទៅអង្គការគាំទ្រគ្រួសារខ្មែរ ដែលមានលេខទូរស័ព្ទ : (215) 457-3684 គឺលោក ម៉ម យីន ៕

**ខ្មែរប៉ុស្តិ៍**




ដោយ : គឹម កៀន (តពីលេខមុន)

●●●ខ្ញុំសូមអរគុណលោកវរៈសេនីយ៍ហើយ ដែលបានតាមដានទូវរឿងដ៏សោកសៅរបស់អ្នកនិពន្ធខ្ញុំនេះ ។

ប្អូនឯងធ្វើឱ្យខ្ញុំសប្បាយរីករាយផង ឈឺផ្សារផង ទៅតាមសាច់រឿងប្អូនឯងសរសេរ ។ មកពីមានដំណើរដើមទងយ៉ាងនោះហើយ ទើបខ្ញុំមកពិធីរាត្រីសមោសរនេះ ប្រាថ្នាចង់ឱ្យបានជួបប្អូនឯង ឥឡូវបានជួបមែន !

- អរព្រះគុណណាស់ ដែលបានលោកវរៈសេនីយ៍ យកចិត្តទុក្ខដាក់គាំទ្រ ។

**(ជាដំបូងខ្ញុំសុំអភ័យទោស ដោយពេលវេលាកន្លងទៅយូរក្រៃលហើយ ខ្ញុំបានច្រឡំឈ្មោះលោក ឃ្លាក ប៊ុត និងលោក អ៊ុំ សាវុធ ។ តួអង្គដែលខ្ញុំកំពុងសរសេរនេះ គឺលោកស័ក្តិ ៤ អ៊ុំ សាវុធ មានរហ័សនាមថា ស័ក្តិ ៤ " កំប៉ុងទឹកត្នោតជូ " ឯលោក ឃ្លាត ប៊ុត ក្នុងជំនាន់នោះមានឋានៈជាឧត្តមសេនីយ៍ត្រី ទៅហើយ ។ លោកទាំងពីរ តែងតែគោរពរាប់អានគ្នា ទោះមានឋានន្តរៈស័ក្តិខុសគ្នាក៏ដោយ ។**

**សូមមេត្តាបណ្តែតអារម្មណ៍ទៅដល់សម័យដែលយើងស៊ូស្លាប់ ដើម្បីឯករាជ្យភាពនៃមាតុភូមិយើងតទៅទៀតចុះ ។)**

សម្លឹងមុនប្អូនធម៌របស់ខ្លួន ហាក់ដូចកំពុងគិតអ្វីវែងឆ្ងាយ លោកស័ក្តិ ៤ អ៊ុំ សាវុធ សង្កត់ធ្ងន់នូវសំនួររបស់ខ្លួនម្តងទៀត :

- អាប្អូន ! ឯងមិនទាន់ឆ្លើយនៅសំនួររបស់បង ម៉េចបានជាឯងសម្រេចចិត្តបោះបង់ការរៀនសូត្រតទៅមុនទៀត មក " ស៊ីឈ្នួលលីដែកលក់ជីវិតដូចបងយ៉ាងនេះ ? "

- ខ្ញុំរៀនចប់មហាវិទ្យាល័យកសិកម្មផ្នែកបសុវិទ្យារួចហើយបង ! ខ្ញុំបានស្ម័គ្រចិត្តទៅរៀននៅសាលាយោធា ដាឡាត ចប់ទៀតហើយ ទើបបានមកអោបកាំភ្លើង រក្សាទឹកដី មាតុភូមិ តាមក្តីអំពាវនាវរបស់ឧត្តមសេនីយ៍ លន់ នល់ ជាប្រធានតស៊ូរក្សាកុំឱ្យបាត់មួយចំអាមនៃទឹកដីកេរ្តិ៍មរតករបស់ដូនតាយើង ដែលនៅសេសសល់បន្តិចបន្តួចនេះ ! លោកវរៈសេនីយ៍ឯកសម្លឹងមុខ វិរៈ ដោយអាណិត :

- ឯងនិយាយមិនទាន់អស់រឿងរបស់ឯងទេ ឯងត្រូវបានអាហារូបករណ៍ទៅរៀនស្រុកបារាំង ជាបន្តនៅវិទ្យាស្ថាន ប៉ាស្ទ័រ (Institut Pasteur) ទៀត ផ្នែកខាង Serolodie និង Vaccin ទៀតផង ម៉េចឯងមិនទៅ ?

- ម៉េចលោកបងពូកែដឹងម្ល៉េះ ។

- អាប្អូន ! ធ្វើបងឯង ត្រូវតែដឹងពីឯងយ៉ាងណឹង ! ។

សង្ស័យយ៉ាងខ្លាំង ទើប វិរៈ ដាច់ចិត្តសួរបន្តទៀត ដោយញញើតញញើម :

- លោកបងតាមដានប្អូនប្រុសរបស់បងឬ?

លោក អ៊ុំ សាវុធ ញញឹម :

- បងបានតាមដានឯង ធ្វើឱ្យបងកាន់តែស្រឡាញ់ឯង ហើយអាណិតឯង ! អាប្អូនកំសត់របស់បង !

- ម៉េចបានជាបងខំតាមដានប្អូន ? មានរឿងអីខុសឆ្គងឬ ?

លោក អ៊ុំ សាវុធ ញញឹម សម្លឹង វិរៈ ដោយអាណិត :

- រឿងនេះវាអញ្ចេះទេ អាប្អូន បងដឹងថា ឯងបានស្រឡាញ់នារីម្នាក់ គេជាកូនស្រីតែមួយគត់របស់ចៅហ្វាយបង ហើយកូនស្រីនោះបានស្ម័គ្រចិត្តធ្វើជាសាស្ត្រាចារ្យ បែកក្រុមគ្រួសារពីភ្នំពេញ មកបង្រៀននៅវិទ្យាល័យ អង្គតាសោម ខេត្តតាកែវ ។ ដោយឯងស្រឡាញ់នាងផង ដោយមានក្តីស្នេហាជាតិមុះមុតផង ឯងបានបោះបង់ចោលអាហារូបករណ៍ស្រុកបារាំង បែរជាទៅរៀនមហាវិទ្យាល័យកងទ័ពនៅវៀត-ណាម ដើម្បីត្រឡប់មកមាតុភូមិវិញ បំរើជាតិផង និងមានឋានៈក្នុងសង្គមផង ដើម្បីបានឱកាសនឹងចូលស្តីដណ្តឹងនាងផង ។

វិរៈ មានទឹកមុខស្រពាប់ស្រពោន សួរទៅបងធម៌របស់ខ្លួន ដោយសម្លេងញ័រៗ :

- បងស៊ើបតាំងពីពេលណាមក បានជាដឹងរឿងប្អូនច្បាស់ម្លេះ ?

- តាំងតែពីចៅហ្វាយបងមានកង្វល់ខ្លាំងនឹងកូនស្រីគាត់មិនព្រមទទួលបុរសម្នាក់ចេញពីមហាវិទ្យាល័យស្រុកបារាំង ជាវិស្វករកសិ-កម្មដែរនោះ តែគេរៀនយកឯកទេសខាងដំណាំប្រទេសក្តៅ ( Ingerieur Agronome at Ape-cialist en Agriculture Tropicale) ។ មកដល់ប្រទេសភ្លាម តែអ្នកគ្រួសង្សាឯងនៅតែមិនទទួល ! ឯងជាអាប្អូនប្រុសមានសំណាងជាងគេនៅលើលោក ... អ្នកគ្រូបានប្តូរផ្តាច់ ដើម្បីឯងមិនតែប៉ុណ្ណោះ មានទាំងជីដូនចាស់ម្នាក់ និងប្អូនប្រុសជីដូនមួយ បានឈរកាន់ទង់ឯងទាំងអស់គ្នា !

- អរគុណបង ! បងបានយល់ការពិតរបស់ប្អូនប្រុសបង ស្ទើរតែទាំងអស់គ្មានសល់ ប្អូនបានតាមគំរូបងមកលីដែក លក់ជីវិតនៅទីនេះ អស់ច្រើនខែហើយ ។ សុំអភ័យទោស ដោយពុំបានទាក់ទងជូនដំណឹងបងសោះ ! ។

- អើ ! ឯងជាយោធាបញ្ញាវ័ន្ត ឯងចូលចិត្តពាក្យសុំទោស ចូលចិត្តពាក្យផ្អែមល្ហែម នារីណាប៉ះឯង គឺបាក់លោង លេងទៅណារួចពីឯង។ អញ្ចឹងបានជាបងបាក់លោងនឹងកំណាព្យប៉ុន្មានឃ្លារបស់ឯង បំភ្លេចឯងអត់បាន ។ ឯងចង់ឱ្យបងសូត្រឡើងវិញ ឱ្យឯងស្តាប់ទេ ?

និយាយមិនទាន់ចប់ផង គាត់បានសូត្រកំណាព្យនោះភ្លាម :

បងជួបបងម្តងតែមិនភ្លេច !
បំពេញភារកិច្ចសព្វសីមា
ទោះខ្មាំងជ្រកពួននៅទីណា
បងវាយប្រហារឱ្យខ្ទេចខ្ទាំ ! ។
ជើងជាន់កោះធំ ខេត្តកណ្តាល
ប្រញាប់រហ័សទៅស្រុកក្រែក
ព្រោះខ្មាំងទីនោះខំជ្រៀតជ្រែក
បងវាយបំបែកវិនាសបង់ ។
ជីវិតទាហានវាយយ៉ាងណឹង
បងអើយខំប្រឹងសង្គ្រោះជាតិ
ស៊ូស្លាប់ជាខ្មែរលើកទង់ជាតិ
ស្អប់ណាស់ពួកក្បត់ជាន់ជាតិឯង ។

នៅមានតទៅទៀត ! កំណាព្យឯងនៅត្រង់នេះ មានសង្កត់ពាក្យថា " ជាតិ " នេះដល់ទៅ ៣ពាក្យ :

ពួកអ្នកស្នេហាជាតិគេស៊ូស្លាប់ ដើម្បីសង្គ្រោះជាតិ និងលើកខ្ពស់ទង់ជាតិឡើង ឯងពួកក្បត់ក៏មានពាក្យថាជាតិដែរ តែពួកវាជាអ្នកជាន់ពីលើជាតិទៅវិញ ។ មកពីហេតុថា ឯងចង់ឈរលើកទង់ជាតិ ទើបឯងមកលីកាំភ្លើងនៅទីនេះឬ ? និយាយចប់ប្រយោគ មិនទាន់សម្រាកផង គាត់បន្តទៅទៀត :

- ឪពុកក្មេកអនាគតរបស់ឯង បាននាំបងទៅជួបលោកវិទ្យាធិការសកលវិទ្យាល័យរបស់ឯង គឺលោក តាន់ គឹមហួន លោកព្រឹទ្ធបុរសមហាវិទ្យាល័យរបស់ឯង គឺលោក ថាច់ សើន និងលោកវិជ្ជបណ្ឌិតបារាំង Dr. Regroul ព្រមទាំងលោកគ្រូមហាយឹន និងលោកគ្រូមេកុដិរបស់ឯង ។ ទាំងអស់គ្នានេះ បានធ្វើឱ្យអនាគតឪពុកក្មេករបស់ឯង រន្ធត់ចិត្ត ហើយចាប់ផ្តើមអាណិតនិងស្រឡាញ់ឯង ដោយដឹងថា ឯងហ៊ានលះបង់ដើម្បីតែកូនស្រីគាត់ ដោយបានកាត់ចិត្តបោះបង់ចោលអាហារូបករណ៍ស្រុកបារាំង សុខចិត្តចូលទាហាន ធ្វើជាអ្នកស្នេហាបំរើជាតិ ។

តទៅលេខក្រោយ

..." អ្នកតាមដានពីព្រឹត្តិការណ៍នយោបាយទាក់ទងទៅនឹងទំនាស់ព្រំដែនខ្មែរ-សៀម បានដាក់ការព្រួយបារម្ភទួរវាល់ឧបសគ្គធំៗដែលអាចនៅរាំងផ្លូវក្នុងដំណើរការស្វែងរកដំណោះស្រាយព្រំដែន ។ បញ្ហាធំបំផុតដែលអាចនាំឱ្យរាំងស្ទះនោះ គឺភាគីទាំង2មិនទាន់ឯកភាពគ្នាទៅលើការប្រើប្រាស់ផែនទីនៅឡើយ ដោយកម្ពុជាទាមទារការប្រើប្រាស់ផែនទីដែលគូសវាសដោយបារាំង និងមានការទទួលស្គាល់ជាលក្ខណៈអន្តរជាតិ ខណៈដែលភាគីសៀមទាមទារប្រើផែនទីដែលគូសដោយខ្លួនឯងផ្ទាល់ ។ ចំណោទបញ្ហាមួយទៀតគឺការប្រើប្រាស់ពាក្យ ព្រះវិហារ និងប្រាវិហាន ។ ដែលសៀមសុំប្រើពាក្យប្រាវិហាន ដោយយល់ថា ជាពាក្យដែលស្គាល់ដោយប្រជាជនសៀម តែចំពោះកម្ពុជាវិញយល់ថា ពាក្យព្រះវិហារត្រូវបានប្រើប្រាស់ជាសាកលទៅហើយ ដូច្នេះគេមិនគួរយកពាក្យប្រាវិហានមកប្រើនាំឱ្យច្របូកច្របល់ឡើយ..." ។

# ការចរចាព្រំដែនរវាងខ្មែរ_ថៃ



ប្រធានរដ្ឋសភាសៀម (រូបខាងឆ្វេង) និងលោកហេង សំរិន ប្រធានរដ្ឋសភាកម្ពុជា

**បាងកក, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

●●●សភាទាំង2របស់ព្រះរាជាណាចក្រសៀម កាលពីដើមខែកញ្ញាកន្លងទៅនេះ បានធ្វើការពិភាក្សារួមគ្នាទៅលើរបាយការណ៍ព្រំដែន ដែលសម្រេចដោយគណៈកម្មាធិការព្រំដែនកម្ពុជា-សៀមនូវកិច្ចប្រជុំចំនួន3លើកកន្លងមក រួចហើយពួកគេក៏បានធ្វើការអនុម័តនៅក្នុងសម្លេងគាំទ្រ 306សម្លេងទល់នឹងសម្លេងប្រឆាំងចំនួន6សម្លេង។

ប្រធានអង្គការគណៈកម្មការកិច្ចការព្រំដែន លោក ស៊ាន ប៉េងសែ មានប្រសាសន៍ថា ទោះបីជាសភាសៀមបានអនុម័តទៅលើឯកសារព្រំដែនទាំង3នោះដើម្បីធ្វើការចរចាអាចធ្វើឡើងវិញបានក្តី វានឹងមិនប្រាកដថា ជាការទម្លុះទម្លាយនូវភាពទ័លច្រកនៃបញ្ហាព្រំដែនរវាងប្រទេសទាំង2បានឡើយ ។ ព្រោះការចរចាទ្វេភាគីវានឹងមិនមានលទ្ធផលអ្វីទេ បើយើងមិនស្វែងរកការអន្តរាគមន៍ពីស្ថាប័នអន្តរជាតិ ស្របតាមសន្ធិសញ្ញាបារាំង-សៀមឆ្នាំ 1904-1907 តុលាការក្រុងឡាអេ និងអង្គការសហប្រជាជាតិ តាមសន្ធិសញ្ញាសន្តិភាពទីក្រុងប៉ារីសថ្ងៃទី23 ខែ តុលា ឆ្នាំ1991 ជាដើមនោះ ។

របាយការណ៍ដែលសភាសៀមបានអនុម័តនោះ គឺជារបាយការណ៍ព្រំដែនដែលភាគីទាំង2 បានព្រមព្រៀងគ្នានៅក្នុងកិច្ចប្រជុំគណៈកម្មាធិការព្រំដែនប្រទេសទាំង2ចំនួន3លើកកន្លងមកហើយ ដែលបានធ្វើនៅខែវិច្ឆិកា ឆ្នាំ 2008, ខែកុម្ភៈ ឆ្នាំ 2009 និងខែមេសា ឆ្នាំ2009 ។ បន្ទាប់ពីប្រទេសដែលមានភូមិផង របងជាមួយគ្នាបានបង្កាត់ភ្លើងសង្គ្រាមឱ្យមានជម្លោះនៅតំបន់ប្រាសាទព្រះ-វិហារអស់រយៈពេលជាងមួយឆ្នាំកន្លងមកនេះ គឺចាប់តាំងពីថ្ងៃទី15 ខែកក្កដា ឆ្នាំ2008មកម្ល៉េះ ។

ទេសរដ្ឋមន្ត្រី វ៉ា គឹមហុង ប្រធានគណៈកម្មា-ធិការព្រំដែនកម្ពុជា បានប្រាប់អ្នករាយការណ៍ព័ត៌មានឱ្យដឹងថា ការអនុម័តរបស់សភាសៀមទៅលើឯកសារព្រំដែនកម្ពុជា-សៀម ថាគឺជាការបើកផ្លូវដើម្បីឱ្យភាគីទាំង2 អាចបន្តការងារដោះស្រាយបញ្ហាជម្លោះព្រំដែនរវាងប្រទេសទាំង 2ឡើងវិញ បន្ទាប់ពីជម្លោះព្រំដែននេះវាបានជាប់គាំងអស់រយៈពេលជាច្រើនខែរួចមក ។

ដោយលោក វ៉ា គឹមហុង និយាយថា នេះជាព័ត៌មានវិជ្ជមានមួយដែលកម្ពុជាស្វាគមន៍នៃការអនុម័តរបស់សភាសៀមនឹងអនុញ្ញាតឱ្យគណៈ-កម្មាធការព្រំដែនប្រទេសទាំង2អាចបន្តធ្វើការ ដោយយើងនឹងធ្វើការណាត់ជួបគ្នាតទៅទៀត។ ប៉ុន្តែលោកមិនទាន់កំណត់ពេលវេលាបានអំពីការណាត់ជួបគ្នាជាថ្មីនោះ ដោយលោកបានពន្យល់ថា តាមនីតិវិធីក្រោយពីអង្គការនីតិបញ្ញត្តិបានអនុម័តហើយ ខាងនីតិប្រតិបត្តិរបស់សៀមត្រូវជូនដំណឹងមកកម្ពុជាដើម្បីរៀបចំណាត់ជួបគ្នាជាថ្មីទៀត ក្នុងការឆ្ពោះទៅរកការចាប់ផ្តើមការប្រជុំបាន ។

កន្លងមករាជរដ្ឋាភិបាលសៀមតែងតែអះអាងថា បើគ្មានការអនុម័តពីសភាទាំង2របស់ខ្លួនទេ រដ្ឋាភិបាលរបស់ខ្លួនគ្មានសិទ្ធិអ្វីក្នុងការចរចាបញ្ហាជម្លោះព្រំដែនឱ្យមានប្រសិទ្ធភាពទៅរកការដោះស្រាយឱ្យបានដាច់ស្រេចជាមួយកម្ពុជានោះទេ ប៉ុន្តែឥឡូវបាល់ធ្លាក់ទៅដល់ដៃរដ្ឋាភិបាលសៀមរបស់លោកនាយករដ្ឋមន្ត្រី អាប់ភីស៊ីត ហើយសួរថា តើរដ្ឋាភិបាលសៀមពិតជាមានឆន្ទៈដើរចូលតុចរចាទេ ឬក៏មានល្បិចកលដោះសារ គេចវេសទៅរកច្រកណាផ្សេងដើម្បីពន្យាការចរចាបញ្ហាជម្លោះព្រំដែន ? ។

នាយករដ្ឋមន្ត្រី អាប់ភីស៊ីត បានពិភាក្សាជាមួយសហសេវិក និងមន្ត្រីសន្តិសុខអំពីការធ្វើវិសោធនកម្មលើមាត្រា 190 ដ៏ចម្រូងចម្រាស់របស់រដ្ឋធម្មនុញ្ញដែលតម្រូវឱ្យរដ្ឋាភិបាលក្រុងបាងកកចាំបាច់ត្រូវសុំការអនុញ្ញាតពីសភាសៀមជាមុនសិន មុនពេលចុះហត្ថលេខាលើកិច្ចព្រមព្រៀងអន្តរជាតិ ដោយរួមទាំងការចុះហត្ថលេខាលើឯកសារព្រំដែនជាមួយកម្ពុជាផង ។ មាត្រា 190 នៃរដ្ឋធម្មនុញ្ញសៀមបានចែងថា រាល់កិច្ចព្រមព្រៀងអន្តរជាតិដែលទាក់ទងនឹងអធិបតេយ្យភាព និងបូរណភាពទឹកដីត្រូវឆ្លងកាត់ការយល់ព្រមពីសភារបស់សៀម ។

នៅក្នុងកិច្ចប្រជុំមួយកាលពីថ្ងៃ ពុធ ទី 9 ខែកញ្ញា រវាងនាយករដ្ឋមន្ត្រីសៀម អាប់ភីស៊ីត វេចាជីវ៉ា ជាមួយអាជ្ញាធរសន្តិសុខជាតិ និងមន្ត្រី

**តទៅទំព័រទី ១៧**

## (តមកពីទំព័រទី ០១) ទៅលេងហ្វីឡាកុំភ្លេចទៅញ៉ាំបុកល្ហុង...

រស់នៅប្រមាណជាង2ម៉ឺននាក់ ។ ម្ហូបរបៀបនេះ វាមិនត្រឹមតែសំរាប់ហូបចុក

ជាមួយបាយប៉ុណ្ណោះទេ គឺវាប្រសើរជាម្ហូបពិសេសសំរាប់អ្នកចូលចិត្តញ៉ាំស្រា ឬបៀរធ្វើជាគ្រឿងក្លែមគួរឱ្យស្រក់ទឹកមាត់ ។



ក្នុងទិដ្ឋភាពដែលឃើញផ្ទាល់ដែលមានហ៊ុយផ្សែងភ្លើងចង្ក្រានជាមួយនឹងសម្រក់ខ្លាញ់សាច់មាន់ សាច់គោឮសូរសម្លេងឈីវ... ឈីវៗ បង្ហើរចេញនូវក្លិនឈ្ងុយឆ្ងាញ់នោះ គេឃើញភ្ញៀវខ្មែរ ឬជាតិសាសន៍អាស៊ីដទៃទៀតបានទៅកាន់ទីនោះដើម្បីទិញសាច់អាំង ឬបុកល្ហុង និងបាយដំណើបយកទៅបរិភោគជួបជុំគ្រួសារនៅឯផ្ទះ ។ ចំណែកអ្នកចូលចិត្តញ៉ាំស្រា ឬបៀរគេឃើញនាំគ្នាទៅកាន់ទីនោះ ជជែកព្រោកប្រាជ្ញទៅតាមចំណង់ពួកគេជាមួយគ្រឿងក្លែមបុកល្ហុង សាច់អាំងនៅលើតុ កៅអី ដែលអ្នកលក់បានរៀបចំដាក់តាមសួនបន្លែសួនច្បារជាដើម ។

នេះជាការប្រទះភ្នែកលើកទី1របស់អ្នកកាសែតខ្មែរប៉ុស្តិ៍នៅទីនោះសំរាប់ទឹកដីអាមេរិកក្រៅតែពីពិធីជប់លៀង បុណ្យខួបកំណើត ដែលបានធ្វើជួបជុំគ្នានៅតាមផ្ទះ ឬមានលក់នៅតាមភោជនីយដ្ឋានតែប៉ុណ្ណោះ ដែលមានញាតិមិត្តនាំគ្នាអាំងសាច់ បុកល្ហុង ញ៉ាំ ក្លែមលេង ឬលក់ឱ្យភ្ញៀវ ។ ទិដ្ឋភាពនេះបានធ្វើឱ្យអារម្មណ៍យើងគិតថយក្រោយដោយស្មានថា មានតែនៅស្រុកខ្មែរ ដែលមានផលរបរលក់ដូរបើកហាងរបៀបនេះតែប៉ុណ្ណោះ ។

មីង ស្រី ម្ចាស់ផ្ទះដែលបើកហាងលក់សាច់អាំង បាយដំណើប និងបុកល្ហុងបានប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា គាត់រកស៊ីរបរនេះ4ឆ្នាំមកហើយ ដោយលក់ដូរនៅពេលល្ងាចជារៀងរាល់ថ្ងៃ បន្ទាប់ពីរូបគាត់ចេញពីធ្វើការ ។ ដែលរបរមួយនេះវាជួយរំលែកក្នុងជីវភាពគ្រាន់បើដែរ ភ្ញៀវខ្មែរតែងតែមកទិញមកអង្គុយញ៉ាំបុកល្ហុង ផឹកស្រា ឬបៀរ ក្លែមសាច់អាំងជាមួយបាយដំណើប ។

ម្ចាស់ហាងនិយាយថា កន្លែងគាត់ក៏មានភ្ញៀវបរទេសនៃអាស៊ីយើងក៏មានមកទិញមកអង្គុយញ៉ាំដែរ ។ គាត់លក់ដូរក្នុងតម្លៃថោកបំផុតមិនកាប់ថ្លៃ ដែលសាច់មួយចង្កាក់ 1ដុល្លារ. បៀរ Heineken មួយដប2ដុល្លារ ដោយអ្នកទៅញ៉ាំទៅផឹក និងអ្នកទិញយកទៅបរិភោគនៅឯផ្ទះមិនរារែកចិត្តក្នុងការទិញ ឬចូលហូបឡើយ ។

បងប្រុស សិរិទ្ធ ប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា គាត់តែងទៅទីនោះជួបជុំមិត្តភ័ក្តិផឹកបៀរ ក្លែមសាច់ជជែកព្រោកប្រាជ្ញគ្នាជាការកំដរអារម្មណ៍ឱ្យសប្បាយ ។ ពិសេសនាំគ្នានិយាយទៅដល់បញ្ហានយោបាយស្រុកទេស និងការរួបរួមកម្លាំងសហគមន៍ខ្មែរ តើយើងត្រូវធ្វើយ៉ាងណា ដើម្បីឱ្យជាតិយើង ប្រជាជនខ្មែរយើងឱ្យមានការរីកចម្រើនការអប់រំដល់កូនចៅជំនាន់ក្រោយនៅលើទឹកដីអាមេរិកឱ្យគេចវេះពីអំពើអបាយមុខ ពិសេស Gangster គេចសាលា និងឱ្យពួកគេបានយល់ពីអត្តសញ្ញាណជាតិខ្មែរ វប្បធម៌ខ្មែរ ភាសាខ្មែរ ដែលជាការព្រួយបារម្ភថ្ងៃអនាគត ៕

---

នារី អប់រំ គ្រួសារ

## ក្រសួង DHS ដកកូនចេញពីឪម៉ែ"

***ដោយ : ពិន សំខុន***

❖❖❖សូភី រស់នៅតំបន់ឡូគ្នាន់ ក្រុងហ្វីឡាដែលហ្វីយ៉ា មានកូនបួននាក់ ពី ១៥ ឆ្នាំដល់ ៧ ឆ្នាំ ប្តីឥតនៅជិតជាមួយទេ ព្រោះត្រូវធ្វើការនៅរដ្ឋផ្សេង ។ ព្រឹកថ្ងៃសៅរ៍កន្លងទៅនេះ សូភី មិនបានទៅណាទេ ព្រោះចាំទទួលបុគ្គលិករដ្ឋ មកពីក្រសួង DHS ដែលមានភារៈកិច្ចនាំសេចក្តីសម្រេចរបស់តុលាការសម្រាប់អនុវត្តទៅលើអវត្តមានសិស្សនៅសាលារៀន ថ្នាក់បឋម និងមធ្យមសិក្សា ។

ថ្ងៃសៅរ៍ ម៉ោង ១០ព្រឹក អ្នកស្រី ព័រគីន ក្រសួង DHS បានមកដល់ នៅចំពោះមុខកូនស្រី អាយុ ១៥ឆ្នាំ និងម្តាយ គឺនាងសូភី ។ អ្នកស្រី ព័រគីន ផ្តល់ព័ត៌មានថា :

នាងបូរ៉ាមី បានឈប់មិនទៅសាលាចំនួន ៤៥ដង ហើយទៅរៀនយឺត ១០០ដង ។ ករណីនេះតម្រូវឱ្យតុលាការសម្រេចដកការគ្រប់គ្រងកូនចេញពីម្តាយឪពុក ទៅដាក់កន្លែងផ្សេង ដែលមានការធានាថា កូនស្រីនោះនឹងទៅរៀនជាប់លាប់ រីឯម្តាយឪពុក ត្រូវបំពេញការងារសហគមន៍តាមបញ្ជារបស់ចៅក្រមថែមទៀត ។

តើក្រសួងសេវាធនធានមនុស្ស DHS នោះនឹងដកការគ្រប់គ្រងកូនពីអាណាព្យាបាលរបស់ ម្តាយឪពុក នៅករណីណាខ្លះ ? គឺក្នុងករណី :

១- ការរំលោភរូបរាងកាយរបស់កូន

២- ការរំលោភផ្លូវភេទ

៣- ការធ្វេសប្រហែស ដោយករណីជម្ងឺខួរក្បាល

៤- ការធ្វេសប្រហែស ដោយការប្រើគ្រឿងញៀន

៥- ការទុកកូនចោល

៦- ការគ្រប់គ្រងកូនមិនបានគ្រប់គ្រាន់

៧-ផ្ទះដែលមិនអាចឱ្យកូនរស់នៅដោយសុខសាន្តបាន

៨- គ្មានសមត្ថភាពនឹងការពារកូនបាន

៩- គ្មានស្មារតីយល់ដឹងគ្រប់គ្រាន់

១០- ទង្វើរបស់ឪពុកម្តាយ ឬការភ្លេចភ្លាំងដែលអាចនឹងផ្តល់ការគ្រោះថ្នាក់ដល់កូន

១១- ការធ្វេសប្រហែសចំពោះការផ្តល់ថ្នាំព្យាបាល

១២-ភាពមិនចូលចិត្តគ្នា ឬស្អប់គ្នា

១៣- ចង់ឱ្យគេយកកូនទៅគ្រប់គ្រងកន្លែងផ្សេង ដោយចរិយាកូនប្រដៅមិនបាន

១៤- ករណីកូនមិនបានទៅរៀននៅសាលាក្រុមគ្រួសារខ្មែរជាច្រើន **តទៅទំព័រទី១៨**

(តមកពីទំព័រទី ០១)

## ពិធីកាន់បិណ្ឌនៅយូស្តុន...

រួចហើយបង្សុកូលដារឆ្លងឧទ្ទិសកុសលដល់បុព្វបុរសជនដែលបានចែកឋានទៅហើយ ជាកិច្ចបញ្ចប់ពិធី ។

ព្រះសង្ឃនាបិណ្ឌទី៩នេះ ឆាន់នៅលើអាសនៈដែលរៀបសម្រាប់ពិធីសាសនា ដែលព្រះអង្គគង់ពែនភ្នែន ក៏ប៉ុន្តែក្នុងករណីធម្មតាព្រះសង្ឃបីអង្គ ដែលមានចៅអធិការព្រះនាម អៀនយូម៉េង ឆាន់នៅតុ និងកៅអីយ៉ាងប្រណិត ដែលពុទ្ធបរិស័ទប្រគេនជាសម្បត្តិវត្ត ។ រីឯម្ហូបអាហារទទួលភ្ញៀវជាឧបាសក ក៏រៀបមានលក្ខណៈអនាម័យ ហើយមានតុ និងកៅអីអង្គុយគ្រប់គ្នាសម្រួលកាយ ធ្វើឱ្យម្ហូបអាហារ និងភាពរាក់ទាក់រីតតែប្រព្រឹត្តទៅបានបរិបូណ៌ ។ ពិធីទាំងសាសនា និងទាំងបដិសណ្ឋារកិច្ច ពុំបានប្រព្រឹត្តទៅនៅក្នុងព្រះវិហារដ៏ថ្មីស្រឡាងនោះទេ ព្រោះជាពិធីដែលទាក់ទងតែនឹងជីវភាពព្រះសង្ឃ និងការឧទ្ទិសកុសលដល់បុព្វបុរសតែប៉ុណ្ណោះ ។ លោក សូវ ម៉ូវ ប្រធានគណកម្មាធិការវត្តនិយាយថា "យើងបានប្រឹងប្រែងឱ្យមានព្រះវិហារមួយសម្រាប់វត្តខេមរារាម ខ្ញុំយល់ថា វត្តគ្មានវិហារ គឺពុំមែនជាវត្តទេ " ។ វត្តខេមរារាម មានទីធ្លាធំទូលាយ ដែលអាចសង់ជាសាលាឆាន់ និងកុដិស្អាតបាត បង្គន់អនាម័យ សម្រាប់ពុទ្ធបរិស័ទ មានរោងមហោស្រពសម្រាប់ពលរដ្ឋមកកំសាន្ត ហើយមានគម្រោងពង្រីកបរិវេណ ដើម្បីជាឧទ្យានសំរាប់ភាវនាធម៌ទៀតផង ។



វត្តខេមរារាម



ទិដ្ឋភាពនៃពិធីរាប់បាត់របស់ពុទ្ធបរិស័ទ នៅវត្តខេមរារាម

ព្រះតេជគុណ រឿន សារ៉ាត រំលឹកពីប្រវត្តិបុណ្យភ្ជុំបិណ្ឌថា " បុណ្យនេះ ពុំមានធ្វើនៅលាវ ឬសៀម ដែលកាន់ព្រះពុទ្ធសាសនា ថេរវាទដូចគ្នានោះទេ គឺនៅជំនាន់ព្រះបាទអង្គដួង ដែលបានបួសរៀនសូត្រជ្រៅជ្រះ ហើយធ្លាប់ត្រូវសៀមគៀរជាឈ្លើយទៅនៅស្រុកសៀមផង បានបង្កើតបុណ្យនេះឡើងសម្រាប់រំលឹកគុណដល់បុព្វបុរសខ្មែរជាច្រើនដែលត្រូវសៀមគៀរយកទៅស្លាប់នៅស្រុកគេ និងយុទ្ធជនដ៏ច្រើន ដែលបានស្លាប់ក្នុងសង្គ្រាមការពារជាតិ តែពុំមាននរណាម្នាក់រំលឹកដល់វិញ្ញាណក្ខន្ធបុព្វបុរសជនទាំងអស់នោះនៅឡើយទេ នាពេលនោះ ។ ព្រះបាទអង្គដួង បានរៀបចំពិធីភ្ជុំបិណ្ឌ សម្រាប់រំលឹកដល់បុព្វបុរសជាទៀងទាត់ រហូតដល់បានក្លាយទៅជាប្រពៃណីជាតិជារហូតមក ។

ថ្ងៃកាន់បិណ្ឌទី ៩ នោះ អ្នកស្រី ញ៉ែម សុមន្ថា ប្រមូលបច្ច័យបាន $1800 ដុល្លារ ហើយដល់ថ្ងៃទី ៩ នេះ គណកម្មាធិការបុណ្យ បានប្រកាសថាបច្ច័យដែលរកបានប្រមាណ1ម៉ឺន3ពាន់ដុល្លារហើយ ហើយគ្រួសារអ្នកកាន់បិណ្ឌ ដែលចូលបច្ច័យច្រើនជាងគេ គឺគ្រួសារពាណិជ្ជករ កេន សារ៉ាសុខ ដែលប្រគេនបច្ច័យ ជាងបួនពាន់ដុល្លារដល់វត្ត លោក កេនសារ៉ា និយាយថា វត្តនឹងទទួលបច្ច័យបាន នាឆ្នាំនេះ យ៉ាងតិចក៏ 2ម៉ឺនដុល្លារដែរ ។

ក្រុង យូស្តុន មានពលរដ្ឋសហគមន៍ខ្មែរប្រមាណ 7 ពាន់នាក់ រស់នៅ អ្នកទាំងអស់នោះមានជីវភាពខ្ពស់ប្រសើរជាងខ្មែរ នៅតំបន់ឯទៀតៗ ហើយមានវត្តខ្មែរបួន នៅទីក្រុងនោះ ៕

# សហគមន៍ខ្មែរកម្ពុជាក្រោមដំណើរទៅកាន់មាតុភូមិ

*ដោយ : គឹមភៀន*

●●●ក្នុងជំនួបគ្នាមួយ នៅថ្ងៃអាទិត្យ ទី៣០ ខែ សីហា ឆ្នាំ ២០០៩ នៅវត្តសុរិយារង្សី ក្រុង ហ្វីឡាដែលភា ។ នេះជាជំនួបពិសេសមួយ មានអត្ថន័យជ្រាលជ្រៅ នាំក្តីសង្ឃឹមយ៉ាង ធំធេងមកឱ្យខ្មែរគ្រប់គ្នា ទាំងខ្មែរនៅក្រៅស្រុក ពិសេស ចំពោះខ្មែរកម្ពុជាក្រោមទាំងអស់នៅ គ្រប់ទិសទីនៃពិភពលោកទាំងមូល ។ គេសង្កេត ឃើញបងប្អូនខ្មែរកណ្តាលមកចូលរួមយ៉ាង កោះករជាមួយបងប្អូនកម្ពុជាក្រោម ជាអ្នក បាត់បង់ទឹកដីផ្ទាល់ ។

សហព័ន្ធខ្មែរកម្ពុជាក្រោម មានបំណងជូន ដំណឹងថា ការតស៊ូហូរញើសក្លាយជាទឹក, បូជា កម្លាំងកាយចិត្តក្នុងប៉ុន្មានទសវត្សនេះ លទ្ធផល ជាវិជ្ជមានបានចេញមកច្បាស់ហើយ គឺយើង ទាំងអស់គ្នាបានមកដល់ចំណុចមួយ ដែលយើង ត្រូវរៀបចំខ្លួន និងកិច្ចការរបស់យើង ក្នុងដំណើរ ត្រឡប់ទៅកាន់មាតុភូមិរបស់យើង ដែលយើង ត្រូវបានបង្ខំចិត្តចាកចេញ ហើយក្លាយជាជន ពនេសចរគ្រប់ច្រកល្ហកនៃពិភពលោក ដូចជា ជនជាតិ ស៊្វីហ្វ ក្នុងអតីតកាលដែលតម្រង់ទៅ កសាងប្រទេស អ៊ីស្រាអែល ក្នុងឆ្នាំ ១៩៤៥ យ៉ាងនោះដែរ ។

ក្នុងការជួបជុំគ្នានោះ យើងសង្កេតឃើញ វត្តមានរបស់លោក តោ គឹមថុង អធិបតីនៃ សហព័ន្ធខ្មែរកម្ពុជាក្រោម ។ ព្រះសង្ឃ ថាច់ ប៊ឺរុង តំណាងខាងព្រះសង្ឃ. លោក ថាច់ ង៉ុកថាច់ ប្រធានប្រតិបត្តិ, លោក ត្រឹង យ៉ាប, លោក ត្រឹង ម៉ានរីន, លោកស្រី សឺន ធិនិត... អ្នកទាំងអស់ សុទ្ធតែជាវាគ្មិនក្នុងពេលជួបជុំគ្នានោះ ។

គោលបំណងនៃការថ្លែងការណ៍ទាំងនោះ បានបញ្ជាក់ឱ្យអ្នកស្តាប់ដឹងថា ទឹកដីកម្ពុជា ក្រោម ដែលបានបាត់បង់ទៅ ម្ចាស់ទឹកដីបាន ក្លាយជាខ្ញុំកញ្ជះម្ចាស់ស្រុកចំណូលថ្មី ហើយគ្មាន អ្នកណាម្នាក់ដឹងឮលើពិភពលោកនេះ ។ សហ- ព័ន្ធខ្មែកម្ពុជាក្រោម បានឈរយ៉ាងពេញច្បាប់ នៅអង្គការសហប្រជាជាតិ ដើម្បីថ្កោលទោស ចំពោះរដ្ឋាភិបាលកុម្មុយនិស្តយួន ដែលបានជិះ ជាន់សង្កត់សង្កិន បំបាត់សិទ្ធិគ្រប់បែបយ៉ាង របស់យើង មានសាសនា , ទំនៀមទំលាប់ ការ សិក្សាអក្សរសាស្ត្រជាតិ ជាដើម ។

ដើម្បីឱ្យខ្មែរវង្វេងជាមួយពួកវា វាបានបង្កើត នូវហេតុការណ៍ផ្សេងៗយ៉ាងច្រើន ដូចជា ខ្មែរ គេឱ្យនាំគ្នាធ្វើបុណ្យយ៉ាងគគ្រឹកគគ្រេងនៅឯ កម្ពុជាក្រោម ។ ធ្វើយ៉ាងនេះ គេចង់ឱ្យយើង យល់ច្រឡំថា កម្ពុជា និងបងប្អូនខ្មែរកម្ពុជា ក្រោម ឥឡូវនេះ មានទំនាក់ទំនងគ្នាល្អណាស់ ថ្មីៗនេះ គេឃើញលោក ខៀវ កញ្ញារិទ្ធ ដឹកនាំ គណៈប្រតិភូទៅធ្វើបុណ្យនៅកម្ពុជាក្រោម មើលទៅគួរឱ្យសប្បាយរីករាយណាស់ ។ ក្នុង រឿងនេះ យើងអាណិតលោក ខៀវ កញ្ញារិទ្ធ ដែលមិនអាណិតអាសូរដល់ឈាមរបស់លោក ដែលកំពុងតែត្រូវសត្រូវជិះជាន់ តែលោកមិន អាចជួយបានអ្វីទាំងអស់ ។ ពេលគេបង្គាប់ឱ្យ លោកទៅធ្វើបុណ្យ ដើម្បីយុទ្ធវិធីនយោបាយ របស់គេ លោកក៏ត្រូវធ្វើតាមបង្គាប់របស់គេ ។ ពេលគេមិនទាន់ឱ្យទៅ លោកក៏មិនហ៊ានទៅ ទៀតឡើយ ។ យើងជាខ្មែរក្រោមទាំងអស់គ្នា យើងយល់ការពិតទាំងអស់នោះ យើងមិនខឹង នឹងបងប្អូនរបស់យើងសោះឡើយ ។ តែឱកាស នោះ សូមអស់លោកទាំងអស់បើកភ្នែកធំៗ សម្លឹងកម្ពុជាក្រោមឱ្យច្បាស់ តើគ្នានៅស្រឡាញ់ សាច់ឈាមឯងប៉ុណ្ណា ? គួរបំភ្លេច ឬបោះបង់ ឈាមយើងមួយដុំនោះចោលបានទេ ? ពេល ប្រទេសកម្ពុជា មានទុក្ខ ខ្មែរកម្ពុជាក្រោម មិន ខ្លាចស្លាប់ រត់ចូលប្រយុទ្ធ ដើម្បីសង្គ្រោះប្រទេស កម្ពុជា ជាប្រទេសក្នុងព្រលឹងវិញ្ញាណរបស់ខ្លួន ឧទាហរណ៍ កាលចម្បាំងប្រឆាំងពួកវៀតមិញ នៅលើទឹកដីនៃរាជាណាចក្រកម្ពុជា ក្នុងទសវត្ស ៥០ ពួកទាហានខ្មែរកម្ពុជាក្រោម ក្នុងកងទ័ព បារាំងបានបូជាជីវិតខ្លួនឯង ដេញពួកវៀតមិញ ឱ្យទៅស្រុកខ្លួនវិញ ព្រោះពួកវាចង់ក្រាញនៅ ប្រទេសកម្ពុជា ជំនួសឱ្យបារាំង ។

ដល់ឆ្នាំ ១៩៧០ ស្រុកខ្មែរមានសង្គ្រាម ជាមួយពួកទមិឡកុម្មុយនិស្តយួនហាណូយ ខ្មែរក្រោមចូលមកស្លាប់ ដើម្បីសង្គ្រោះប្រទេស កម្ពុជាសាធារណរដ្ឋ ក្រោមផ្លាក "ម៉េផក្ស" នៃព្រឹទ្ធាចារ្យ សឺន ង៉ុកថាច់ ទៀត ។ យើងជា បងប្អូនមានពេលខ្លះ យើងមិនអាចអោបគ្នា យំ បានតែយើងយំរៀងៗខ្លួន ! ។

ឥឡូវមានក្បាច់មួយថ្មី ដែលកូនចៅរបស់ "អ៊ុំ ហូ " កំពុងលេងជាមួយខ្មែរកម្ពុជាក្រោម នោះ គឺគេលេងរបៀបបញ្ចូលមាន់ ដោយលាប វា ។ គេបានឱ្យគណៈប្រតិភូខ្មែរកម្ពុជាក្រោម មួយក្រុមចេញដំណើរពីព្រៃនគរ មកសហរដ្ឋ អាមេរិក ដើម្បីជួបជុំជាមួយសហព័ន្ធខ្មែរកម្ពុជា ក្រោម ។ ដោយដឹងថា នេះជាល្បិចកលរបស់ សត្រូវ សហព័ន្ធមិនចេញទទួលសាច់ឈាមរបស់ ខ្លួន ព្រោះថា ល្បិចនេះមានបំណងបំបែកបំបាក់ ខ្មែរកម្ពុជាក្រោម ដែលនៅបរទេសប្រឆាំងនឹង យួន ក្នុងសមរភូមិខុសៗគ្នា ឱ្យបំបែកបំបាក់គ្នា ដោយមន្ទិលសង្ស័យគ្នាថា ក្រុមនេះត្រូវគ្នានឹង យួនទៅហើយ យើងត្រូវប្រឆាំងនឹងវា ។ ក្នុង ចំណោមខ្មែរក្រោម ដែលនៅក្នុងសមរភូមិ ផ្សេងៗគ្នា នោះមាន :

១- សហព័ន្ធខ្មែរកម្ពុជាក្រោម
២- ក្រុមរដ្ឋាភិបាលខ្មែរកម្ពុជាក្រោម
៣- ក្រុមសហគមខ្មែរកម្ពុជាក្រោម

តាមប្រសាសន៍លោក ថាច់ ង៉ុកថាច់ ថា សហព័ន្ធខ្មែរកម្ពុជាក្រោម "ខ្លោចចិត្តណាស់ ដោយបង្ខំចិត្តមិនទទួលជួបគណៈប្រតិភូ ដែល កាត់មកពីព្រៃនគរ មកដល់ វ៉ាស៊ិនតោន តែ បើជួបសាច់ឈាមឯង យួនចំណេញនយោបាយ ច្រើនហួសពេក អាចធ្វើឱ្យបងប្អូននៅឯនេះ បែក បាក់ខ្ទេចខ្ទីអស់ " ។

រឿងលំបាករបស់សហព័ន្ធ គឺរឿងថវិកាក្នុង ការអំពាវនាវនោះ គេឃើញព្រឹទ្ធាចារ្យ នាម ហួត បានជួយសហព័ន្ធ ១ខែ $100ដុល្លារ ១ឆ្នាំ $1200ដុល្លារ ។ នេះជាគំរូល្អ សម្រាប់បងប្អូន ឯទៀត ដែលមិនទាន់បានចូលមកជួយសហព័ន្ធ ក្នុងដំណើរឆ្ពោះទៅមាតុភូមិ ៕

(តមកពីទំព័រទី ០១)

## មាស សែម បេក្ខជនសភាអាមេរិកាំង...

ក្នុងកិច្ចសម្ភាសន៍ជាមួយកាសែតខ្មែរប៉ុស្តិ៍កាលពីចុងសប្តាហ៍នេះ ។

មាស សែម អាយុ37ឆ្នាំ ដែលធំដឹងក្តី និងបញ្ចប់ការសិក្សាថ្នាក់បរិញ្ញាបត្រចេញពីសាកលវិទ្យាល័យ Virginia Tech នៅរដ្ឋ Virginia បាននិយាយឱ្យដឹងថា "ខ្ញុំចង់ឃើញសង្គមខ្មែរដែលនៅរដ្ឋរបស់ខ្ញុំ គឺរដ្ឋម៉ាហ្សាឈូសេត មានក្រុងឡូវែល និងបូស្តុន មានខ្មែរប្រមាណជាង4ម៉ឺននាក់ ប៉ុន្តែមិនមានសំឡេង ឬអ្នកតំណាងរបស់ខ្លួន ដើម្បីប្រយុទ្ធប្រឆាំងតាមផ្លូវច្បាប់ និងតវ៉ាក្នុងកិច្ចការពារសិទ្ធិរបស់ខ្លួន ឬសហគមន៍ខ្លួន ជាមួយរដ្ឋាភិបាលតំបន់សហព័ន្ធ និងតាមផ្លូវតុលាការជាដើម ។ ដូច្នេះ ខ្ញុំយល់ថា បងប្អូនខ្មែរគួរតែធ្វើឱ្យខ្លួនទៅជាពលរដ្ឋអាមេរិកាំងតាមរយៈការចូលសញ្ជាតិ ហើយស្វែងយល់ពីបញ្ហានយោបាយអាមេរិកាំង ដូចជានាំគ្នាទៅបោះឆ្នោតក្នុងការបង្ហាញពីសន្ទុះនៃសំឡេងក្នុងសហគមន៍ខ្លួន ដើម្បីការពារសិទ្ធិ និងចាប់យកកិច្ចការអភិវឌ្ឍន៍មូលដ្ឋានក្នុងសំឡេងមតិភាគច្រើន" ។

ជាបេក្ខជនសភាតំណាងរាស្ត្រមកពីគណបក្សសាធារណរដ្ឋ មាស សែម បានបង្ហាញជំហរឱ្យដឹងថា ប្រសិនបើរូបគាត់ជាប់ឆ្នោត គាត់នឹងពង្រីងពីបញ្ហា ការអប់រំ បញ្ចុះពន្ធតាក់ ស្នើឱ្យមានការផ្តល់ប្រាក់កម្ចីឱ្យឈ្មួញរកស៊ីតូចតាចមានលទ្ធភាពរកស៊ីទៅបាន ដែលជាការជួយកាត់បន្ថយដល់អ្នកអត់មានការងារធ្វើបញ្ហាបញ្ជូនមនុស្សត្រឡប់ទៅកាន់មាតុភូមិកំណើត (អន្តោប្រវេសន៍) កំណែទម្រង់ប្រព័ន្ធ Welfare (ជំនួយផ្គត់ផ្គង់ពីរដ្ឋ) ពួកយុទ្ធជន ដែលឈប់ពីការធ្វើទាហានមានសិទ្ធិទទួលលុយរដ្ឋដោយអាទិភាព បន្តការសិក្សាជាដើម ។

ចំណែកបញ្ហានយោបាយក្រៅប្រទេស ដោយផ្តោតចំពោះកម្ពុជា បេក្ខជនតំណាងរាស្ត្ររបស់អាមេរិករូបនេះ បានអះអាងថា រូបលោកនឹងធ្វើការជាមួយរដ្ឋាភិបាលអាមេរិក ឬអង្គការអន្តរជាតិធំៗឱ្យបន្តការឃ្លាំមើល និងពង្រីងបន្ថែមពីបញ្ហាសិទ្ធិមនុស្ស និងការគោរពលទ្ធិប្រជាធិបតេយ្យ ។ ហើយក៏នឹងខិតខំបញ្ចុះបញ្ចូលអ្នកវិនិយោគទុនអាមេរិកឱ្យងាកទៅរកការដាក់ភាគហ៊ុនរកស៊ីនៅកម្ពុជា ។ ប៉ុន្តែ





លោក មាស សែម ភរិយា និងកូនៗ

កម្ពុជាខ្លួនឯងត្រូវពង្រីងផ្នែកច្បាប់ឱ្យបានច្បាស់លាស់ជាមុនសិន ដើម្បីបង្ហាញទំនុកទុកចិត្តឱ្យអ្នកវិនិយោគិន ។

ជាមនុស្សម្នាក់ក្នុងវិជ្ជាជីវៈផ្នែកពាណិជ្ជកម្ម និងហិរញ្ញវត្ថុក្នុងក្រុមហ៊ុនវិនិយោគទុនដ៏ធំមួយនៅក្នុងរដ្ឋម៉ាហ្សាឈូសេត មាស សែម បានអំពាវនាវឱ្យបងប្អូនខ្មែរទៅចុះឈ្មោះបោះឆ្នោតឱ្យបានច្រើនកុះករ ប្រសិនបើមានសញ្ជាតិរួចហើយ ។ ហើយអ្នកគ្មានសញ្ជាតិមេត្តាចូលជាសញ្ជាតិដើម្បីពង្រីងកម្លាំង និងសំឡេងក្នុងនាមជាខ្មែរ-អាមេរិកាំងដល់ការលើកមុខមាត់ជាតិយើង និងអភិវឌ្ឍន៍សហគមន៍ខ្លួន ។ ដូច្នេះ សូមមេត្តាបោះឆ្នោតឱ្យរូបគាត់ នៅថ្ងៃទី4 ខែវិច្ឆិកា ឆ្នាំ 2010 ដើម្បីបម្រើលោក-អ្នក ឱ្យអស់ពីសមត្ថភាព ដោយព្យាយាមធ្វើជាអ្នកការពារ និងគាំទ្រនូវផលប្រយោជន៍លោក-អ្នក ។

បេក្ខជនសភាតំណាងរាស្ត្រ មាស សែម គឺជាក្មេងកំព្រាដែលឪពុកម្តាយបានស្លាប់ចោលអស់ក្នុងរបប ប៉ុល ពត ។ ឆ្នាំ 1983 អតីតក្មេងកំព្រារូបនេះ បានរត់ចេញពីស្រុកកំណើតជាអ្នកខេត្តកណ្តាល មករស់នៅជំរំខៅអ៊ីដាង ក្នុងជីវិតលំបាកលំបិនអត់ឃ្លាន និងរស់ក្រោមការធ្វើបាបពីសំណាក់ទាហានសៀម ក្នុងជុំវិញព័ទ្ធទៅដោយរបងលួសបន្លា ដូចអតីតជនភៀសខ្លួនដទៃទៀត ស៊ូទ្រាំរហូតដល់មានការគាំទ្រ និងការជួយទំនុកបម្រុងពីសំណាក់អង្គការសហប្រជាជាតិ (UNBRO) រហូតដល់ខែ វិច្ឆិកា ឆ្នាំ 1986 រូបគេបានមកកាន់សហរដ្ឋអាមេរិក ដែលមានឪពុកម្តាយធម៌ជាអ្នកធានា និងចិញ្ចឹម បីបាច់ថែរក្សាដូចជាកូនបង្កើតនៅរដ្ឋ Virginia រហូតដល់ធំដឹងក្តីបញ្ចប់ការសិក្សាបរិញ្ញាប័ត្រ មានការងារធ្វើ និងរស់រានដោយសុភមង្គលជាមួយគ្រួសារ មានប្រពន្ធ និងកូនស្រី2នាក់ នៅក្រុង Haverhill រដ្ឋ Massachusetts ។

លោក មាស សែម បានបង្ហាញពីភាពរីករាយ និងក្តីរំភើបដោយអរគុណចំពោះបងប្អូនខ្មែរនៅក្រុង Lowell, Boston ក៏ដូចអ្នកដឹកនាំសហគមន៍ខ្មែរ និងពលរដ្ឋអាមេរិក អ្នកមុខអ្នកការអាមេរិក ដែលបានជម្រុញលើកទឹកចិត្តដោយគាំទ្ររូបគាត់ជាបេក្ខជនសភាតំណាងរាស្ត្ររបស់អាមេរិក ។

អ្នកចាស់ទុំផ្នែកនយោបាយនៅសហរដ្ឋអាមេរិក ជាច្រើនគ្នាបានបង្ហាញទស្សនៈប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា វាជាដំណាក់កាលដែលកូនខ្មែរ-អាមេរិកាំង ត្រូវបង្ហាញពីសមត្ថភាពការងារនយោបាយកិច្ចការកសាងជាតិ2 គឺជាតិអាមេរិក និងជាតិខ្មែរ ដើម្បីស្វែងរកមោទនភាពនៃជនជាតិអាស៊ីក្នុងនាមជាឈាមជ័រជាខ្មែរដែរនោះ និងក៏ជាការបង្ហាញពីឥទ្ធិពលក្នុងនាមខ្លួនជាពលរដ្ឋអាមេរិកផងដែរ ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** ***តពីលេខមុន***

●●●អតីតក្រុមគណបក្សប្រជាធិបតេយ្យ ដូចលោក កេង វ៉ាន់សាក់ បានចូលទៅខាងសាធារណរដ្ឋ រីឯ ជួន មុំ, ជួន ប្រសិទ្ធិ រត់ទៅចូលខាងរដ្ឋបាលសីហនុ " GRUNK " ។

**១៤ មេសា** : ឧទ្ធម្ភាគចក្រអាមេរិកាំង ប្រមាណជា ៤០ បានវាយលុកនៅតំបន់ក្រែត កំពង់ចាម ។

**១៦ មេសា** : សហគមន៍អន្តរជាតិ ចាប់អារម្មណ៍ពីការសម្លាប់ពលរដ្ឋស៊ីវិលវៀតណាម កាន់តែធំ និងសាហាវឡើង ។

**២០ មេសា** : លន់ នល់ សុំជំនួយជាផ្លូវការទៅសហរដ្ឋអាមេរិក ។

**២៥ មេសា** : ការវាយលុករបស់កងទ័ពរំដោះ FAPLNIK ត្រូវបានបញ្ចប់ ។

**២៤-២៥ មេសា** : មានការប្រជុំកំពូល នៅកង់តុង (ចិន) នៃប្រជាជនឥណ្ឌូចិន រួមកម្លាំងនឹងសម្តេច សីហនុ (ខ្មែរ) សុផានុវង្ស (លាវ) ង្វៀង ហ៊ុយ ថូ (រណសិរ្សវៀតណាម) ហើយនឹង ផាំ វ៉ាន់ដុង (វៀតណាមខាងជើង) ។ ទម្លាក់គ្រាប់បែកដោយអាកាសចរអាមេរិក ក្រុមបារាំងចំការកៅស៊ូមេមត់ ចាកចេញពីកំពង់ចាម ។

**២៩ មេសា** : ការចូលលុករបស់ទ័ពសហរដ្ឋអាមេរិក និងវៀតណាមខាងត្បូង មកលើកម្ពុជា ដែលមិនដែលមាន បន្ទាប់ពីឆ្នាំ ១៩៦៨ ដែលជាបុព្វហេតុធ្វើឱ្យទ័ពវៀតណាមខាងជើងរត់ទៅក្នុងកម្ពុជា កាន់តែជ្រៅ ។ គណកម្មាធិការកណ្តាលកុម្មុយនីស្តវៀតណាម រំដោះវៀតណាមខាងត្បូង មកតាំងទីនៅព្រៃកប្រសព្វ (ក្រចេះ) ។ ការវាយលុកបានប្រព្រឹត្តទៅរហូតដល់ខែមិថុនា ទើបចប់ , សង្គ្រាមចាប់ពីពេលនេះទៅបានរីកពេញជ្រោយឥណ្ឌូចិនហើយ ។

**១ ឧសភា** : ទ័ពអាកាស និងទ័ពរថក្រោះអាមេរិកាំង វាយកំទេចមេមត់ និង ស្នួល (កំពង់ចាម) ។

**៣-៤ ឧសភា** : មហាសន្និបាតរណសិរ្សរំដោះខ្មែរ FUNK នៅប្រទេសចិន អនុម័តលើកម្មវិធីនយោបាយ ។

**១៣ ឧសភា** : រៀបចំរដ្ឋាភិបាល GRUNK ឡើងវិញ , រាប់បញ្ចូលទាំងសមាជិកទ័ពព្រៃខ្លះផង ។ ភ្នំពេញ និងបាងកក ដាក់ទូតមកវិញ ដែលចំណងនេះ ត្រូវបានផ្តាច់កាលពីឆ្នាំ ១៩៦១ ។

**នៅក្រុងបេកាំង បន្ទាប់មកនៅក្នុងតំបន់គ្រប់គ្រងដោយរណសិរ្សរួបរួមជាតិកម្ពុជា (រ.រ.ជ.ក) រាជរដ្ឋាភិបាលរួបរួមជាតិកម្ពុជា (រ.រ.ជ.ក)**

.ប្រមុខរដ្ឋ : នរោត្តម សីហនុ

.រ.រ.រ.ក.ជ. ត្រូវបានបង្កើតឡើងនៅថ្ងៃ ៥ ឧសភា ១៩៧០ ។

. រ.រ.រ.ក.ជ.បានប្តូរសមាសភាពជាលើកទី ១ នៅថ្ងៃ ១៣ ឧសភា ១៩៧០

សមាជិក .រ.រ.រ.ក.ជ. គិតត្រឹមថ្ងៃ ១៣ ឧសភា ១៩៧០

. នាយករដ្ឋមន្ត្រី : ប៉ែន នុត

. ឧបនាយករដ្ឋមន្ត្រី រដ្ឋមន្ត្រីការពារជាតិ : ខៀវ សំផន

. រដ្ឋមន្ត្រីប្រតិភូអមទីស្តីការនាយករដ្ឋមន្ត្រី : គាត ឆុន

. រដ្ឋមន្ត្រីការបរទេស : សារិន ឆាក

. រដ្ឋមន្ត្រីព័ត៌មាន និងឃោសនា : ហ៊ូ នឹម

. រដ្ឋមន្ត្រីមហាផ្ទៃ-កែទម្រង់ភូមិឃុំ និងសហករណ៍ : ហ៊ូ យន់

. រដ្ឋមន្ត្រីសេដ្ឋកិច្ច និងហិរញ្ញវត្ថុ : ជួន ម៉ុម

. រដ្ឋមន្ត្រីបេសកកម្មពិសេស : ចៅ សេង

. រដ្ឋមន្ត្រីសំរបសំរួលរវាង រ.រ.ជ.ក និង -រ.រ.រ.ជ.ក- : ជួន ប្រសិទ្ធ

. រដ្ឋមន្ត្រីអប់រំប្រជាជន និងយុវជន : ចាន់ យូរ៉ាន់

. រដ្ឋមន្ត្រីអាវុធយុទ្ធភ័ណ្ឌ : ដួង សំអុល

. រដ្ឋមន្ត្រីយុត្តិធម៌ និងកែទំរង់តុលាការ : ជា សាន

. រដ្ឋមន្ត្រីសាធារណការ-ទូរគមនាគមន៍ និងស្ថាបនាឡើងវិញ : ហួត សម្បត្តិ

. រដ្ឋមន្ត្រីសាធារណសុខាភិបាល ធម្មការ និងកិច្ចការសង្គម : ងៅ ហ៊ូ

. រដ្ឋមន្ត្រីគ្មានតំណែង : នរោត្តម ភូរីស្សារ៉ា

. អនុរដ្ឋមន្ត្រីការបរទេស : ប៉ុកដឹស កុមារ

. អនុរដ្ឋមន្ត្រីការពារជាតិ : គង់ សូឌីប

. អនុរដ្ឋមន្ត្រីមហាផ្ទៃ និងសន្តិសុខជាតិ : សុខ ធូក

. អនុរដ្ឋមន្ត្រីព័ត៌មាន និងឃោសនា : ទីវ អុល

. អនុរដ្ឋមន្ត្រីសេដ្ឋកិច្ច និងហិរញ្ញវត្ថុ : កុយ ធួន

. អនុរដ្ឋមន្ត្រីអប់រំប្រជាជន និងយុវជន : ខៀវ ធីរិទ្ធ

.អនុរដ្ឋមន្ត្រីសាធារណសុខាភិបាល-ធម្មការ និងកិច្ចការសង្គម : ជូ ជេត

ពាក់កណ្តាលខែឧសភា បញ្ចប់បេសកកម្ម " MENU " ដែលយន្តហោះ B52 អាមេរិកាំង បានចេញហោះហើរ ៣៦៣០ដង នៅលើកម្ពុជា ចប់ពីបេសកកម្មហើយក្តី ក៏អាមេរិកាំង នៅតែបន្តការទម្លាក់គ្រាប់បែកនៅពេញផ្ទៃប្រទេស ។

**១៦-១៧ ឧសភា** : សន្និសីទអន្តរជាតិ នៅយាកាតា (ឥណ្ឌូនេស៊ី) ទាមទារឱ្យដកទ័ពបរទេសទាំងអស់ចេញពីកម្ពុជា, អាកាសចរវៀតណាមខាងត្បូង ទម្លាក់គ្រាប់បែកលើសាកលវិទ្យាល័យកំពង់ចាម ។

***តទៅលេខក្រោយ***

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

**(តពីលេខមុន)**



❖រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖បកប្រែជាភាសាចិន ដោយភិក្ខុ ជែន ហាយ
❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖Original Illuatration and Naration in Thai by Guna-payuta.
❖Translation into Chinese by Bhikkhu Jan Hai.
❖Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖Translation into Khmer by Bhikkhu Kong Am.

**៣៦-** នៅពេលពិធីបុណ្យច្រត់ព្រះនង្គ័លចប់សព្វគ្រប់អស់ហើយ ជនទាំងឡាយដែលជាអ្នកបំរើព្រះអង្គ គេនាំគ្នារកមើលព្រះអង្គ ។ ឃើញព្រះអង្គកំពុងគង់នៅស្ងៀមដូចជារូបចម្លាក់នៅក្រោមដើមព្រីងដូច្នោះ គេក៏នាំគ្នាស្ទុះសំដៅទៅរកព្រះអង្គ ។ ជនទាំងនោះតើនព្រះអង្គឡើង ហើយទូលថា ព្រះបិតាទ្រង់កំពុងតែរកព្រះអង្គ ដើម្បីនឹងយាងត្រឡប់ទៅព្រះបរមរាជវាំងវិញ ។ នៅតាមដងផ្លូវព្រះសិទ្ធិត្ថ ទ្រង់មានព្រះទ័យប្រកបដោយករុណា អាណិតអាសូរដល់សព្វសត្វទាំងអស់ ព្រោះសត្វទាំងឡាយនៅពេលដែលចង់ឱ្យជីវិតរស់ ត្រូវតែតស៊ូពុះពារសេចក្តីលំបាក និងទុក្ខវេទនាទាំងឡាយ ។

***តទៅលេខក្រោយ***

36- When the Royal Tiller ceremony and the feast were over, the attendants began to think of prince. They rushed back to him and found the prince sitting motionless like a stone statue under the Jambu tree. They awakened him and told him that the king was looking for it was time to go home. Onthe way, Prince Siddhartha was filled with compassion for all creatures, beacause every single creature, in the course of keeping ifselt alive, has to struggle constantly against pain and suffering.

***( Continue Issue After )***






**ដំណេកជាសេចក្តីត្រូវការផ្នែកជីវសាស្ត្ររបស់រូបកាយញ៉ាំងធានាបាននូវការប្រព្រឹត្តសកម្មភាពជាប្រក្រតីនៃកោសិកាប្រសាទ ក្រោយមួយរយៈពេលដែលធ្វើការងារអូសបន្លាយពេលរួមទាំងអារម្មណ៍ក៏លែងហ្នឹងហ្ន ។**

●●ដំណេកពិតជាជួយដល់ខួរក្បាល ព្រមទាំងរូបកាយទទួលបានមកវិញនូវថាមពលជីវសាស្ត្រប្រក្រតី ។ ដោយសារហេតុយ៉ាងដូច្នេះហើយ ការអត់ងងុយតែត្រឹមមួយយប់ធ្វើឱ្យរូបកាយ និងស្មារតីរបស់មនុស្សបែរជារងការប្រែប្រួលមិនភ្លឺស្វាងហ្នឹងហ្នបាន ។ ប្រសិនបើអាការអត់ងងុយយ៉ាងនេះកាន់តែអូសបន្លាយជាច្រើនយប់តទៅទៀតនោះប្រាកដជាជះឥទ្ធិពលកាន់តែអាក្រក់ថែមទៀតដល់ស្មារតីអារម្មណ៍ និងកំលាំងកាយតែម្តង ។ ដោយសារតែហេតុយ៉ាងដូច្នេះហើយទើបបានជាអាចនិយាយបានថា ដំណេកពិតជានឹងជួយធ្វើឱ្យសុខភាពកំលាំងកាយ ។ ដំណេកដ៏លង់លក់ល្អ នឹងជួយធ្វើឱ្យរូបកាយមានភាពស្រស់ក្មេងជាមួយនឹងស្មារតីក៏កាន់តែភ្លឺស្វាងចងចាំវាងវៃ ហើយចំណែកឯដំណេកមិនគ្រប់គ្រាន់ (មិនគ្រប់ម៉ោង) បែរជាបណ្តាលឱ្យរូបកាយកាន់តែហេវហត់ខ្វះថាមពលទៅវិញតែប៉ុណ្ណោះ ។

**មូលហេតុមួយចំនួនដែលបណ្តាលឱ្យដំណេកលែងលង់លក់អាចបណ្តាលមកពី :**

●រូបកាយធ្លាក់ចុះខ្សោយ ព្រោះតែធ្វើពលកម្មហួសកំលាំងកាយ ការគិតច្រើនពេក បណ្តាលឱ្យខ្វះឈាមរត់មិនដល់ខួរក្បាលបេះដូង មានបញ្ហារួយជើងដៃកើតអាការភ្លេចភ្លាំងច្រើន ។

●ពេលក្រលៀនធ្លាក់ចុះខ្សោយបណ្តាលឱ្យកើតមានអាការហ៊ឹងក្នុងត្រចៀក ឈឺចង្កេះ អារម្មណ៍ស្រងូតស្រងាត់ ។

●ពេលខ្លះអាការដេកពុំលក់ដោយសារតែកើតមានវិបត្តិនៅក្នុងជីវិតរស់នៅវិបត្តិផ្លូវចិត្ត ឬដោយសារតែជំងឺប្រចាំកាយផ្សេងៗទៀត រួមទាំងដោយសារមូលហេតុប្រើប្រាស់ថ្នាំព្យាបាលរយៈពេលយូរពេក ។

●នៅពេលទទួលទានដំណេកមិនលក់ ការកំណត់របបអាហារបរិភោគជារឿងដ៏ចាំបាច់ខានមិនបាន ។

●បញ្ចៀសការផឹកស្រា ជក់បារី ។

●កាត់បន្ថយការបរិភោគអាហារដែលផ្សំទៅដោយគ្រឿងជាច្រើនមុខ ។

●ពេលបរិភោគអាហារត្រូវតែបរិភោគយ៉ាងយឺតៗ ហើយទំពាឱ្យបានម៉ដ្ឋល្អ ។

●បរិភោគបន្លែពណ៌បៃតង និងផ្លែឈើស្រស់ ។

●ពិសាទឹកចាប់ពី២-៣លីត្រក្នុង១ថ្ងៃ ។

●ត្រូវតែបរិភោគអាហារពេលយប់មានគម្លាតពេលឱ្យបានយ៉ាងតិច២ម៉ោងមុនពេលចូលទៅកាន់ដំណេក ៕

សោភ័ណភាព

## ដៃទន់ត្រូវឱ្យចង់អង្អែល ដោយសារផ្លែម្នាស់



...ដៃរបស់យើងតែងតែប្រើចាប់នេះ ចាប់នោះ ជាប្រចាំបន្តិចក៏រងនឹងវត្ថុនេះ បន្តិចក៏ទៅរងនឹងវត្ថុនោះ ធ្វើឱ្យពេលខ្លះធ្វើឱ្យស្បែកដៃក្រិនក្រៀមឡើងគគ្រាតមិនចង់ឱ្យប៉ះ ។ ដូច្នេះយើងងាកមកមើលពីវិធីងាយៗដើម្បីបំប៉នស្បែកដៃឱ្យទន់គួរឱ្យចង់អង្អែលដោយប្រើផ្លែម្នាស់តាមការណែនាំខាងក្រោមៈ

ជំហានដំបូងត្រៀមទឹកផ្លែម្នាស់ប្រមាណ៤ស្លាបព្រាបាយ និងស៊ុតមាន់ចំនួន៤រួចយកទៅលាយជាមួយគ្នាទុកនៅក្នុងកូនចានដែកមួយក្រឡុកចូលគ្នាឱ្យសព្វ ។ បន្ទាប់មកងាកមកសំអាតដៃអ្នកឱ្យស្អាតទាំងក្នុងក្រចក ដោយប្រើសាប៊ូ និងទឹកក្តៅឧណ្ហៗឱ្យបានស្អាត ។



ដំណាក់កាលបន្តដាក់ត្រាំដៃទៅក្នុងទឹកចានដែក ដែលបានលាយទុករួចហើយរយៈពេលពី ១០- ២០នាទីរួចហើយលាងជម្រះចេញនឹងសាប៊ូជាមួយទឹកក្តៅឧណ្ហៗម្តងទៀត ។ បន្ទាប់មកជូតឱ្យស្ងួត ហើយចាប់ផ្តើមលាបក្រែមបំប៉នស្បែកឱ្យបានរាល់ ថ្ងៃដែលយ៉ាងហោចណាស់ព្យាយាមធ្វើបែបនេះ ឱ្យបានមួយសប្តាហ៍ម្តងដែរ ។

គ្រាន់តែធ្វើតាមការណែនាំមកខាងលើនេះធានាថា ស្បែកដៃរបស់អ្នកនឹងឡើងទន់ ហើយរលោងគួរឱ្យចង់បបោសអង្អែលបំផុត ៕

(តមកពីទំព័រទី ០៤)

## សំណាងឈ្នះរបស់សម្ព័ន្ធភាព...

អាចធានាពាក្យសន្យារបស់ខ្លួនបាននោះ ? រីឯលោក ហ៊ុន សែន ទ្រង់ រណឫទ្ធិ គេធ្លាប់បានឃើញការដឹកនាំ ហើយអាចវិនិច្ឆ័យបានដោយមិនខុសចំពោះអនាគតជាតិដែលនឹងមកដល់ ។

ការពិតស្វែងរកមនុស្ស ឬក្រុមមនុស្សដែលមានលក្ខណៈសម្បត្តិល្អឥតខ្ចោះគ្រប់យ៉ាងដូចដែលយើងចង់បានសម្រាប់ការដឹកនាំ គឺជាការស្របើស្រមៃមួយជាប្រាកដគ្មានទេមនុស្សរូបនោះ ប៉ុន្តែយើងត្រូវជ្រើសបុគ្គលដែលប្រសើរជាងគេក្នុងមនុស្សដែលយើងមានពុំមែនមនុស្សដែលប្រសើរបំផុតនោះ ហើយជាពិសេសត្រូវឱ្យជាក់ច្បាស់ក្នុងខ្លួនយើងម្នាក់ៗថា រូបយើងម្នាក់មានអំណាចមួយ បើចង់ឱ្យមានការផ្លាស់ប្តូរ ត្រូវផ្តើមប្រឹងប្រែងរុករកពីរូបខ្លួនឯងមុនគេបង្អស់ ។

ប្រទេសកម្ពុជា ខុសពីប្រទេសភូមា ដោយចរន្តកុម្មុយនីស្ត បានភ្លាត់ស្នៀតឱ្យ អ.ស.ប ចូលមកជួយរៀបចំបោះឆ្នោតឱ្យកម្ពុជា នាឆ្នាំ ១៩៩៣ ។ មកទល់ថ្ងៃនេះភ្នែករបស់ អ.ស.ប នៅកម្ពុជានៅឡើយទេ ដូច្នេះពលរដ្ឋខ្មែរម្នាក់ៗ ឈប់ជឿថា ខ្លួនឯងគ្មានសម្លេងនោះតទៅទៀត ប្រទេសមិនកែប្រែមិនមែនសុទ្ធតែមកពីអ្នកដឹកនាំទាំងអស់ទេ ពលរដ្ឋទាំងក្នុងនិងក្រៅប្រទេសមានចំណែកទទួលខុសត្រូវលើវាសនាកម្ពុជាទាំងអស់គ្នា ៕

***លេខក្រោយខ្ញុំនឹងធ្វើវិភាគណាក់ថាទៅលើរូបមន្តនៃសម្ព័ន្ធភាពនាពេលបោះឆ្នោតខាងមុខទៀត ។***

# ហោរាសាស្ត្រប្រចាំថ្ងៃទី ២៥_០៩ តុលា

**ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ ក្នុងរយៈពេលនេះ បុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្ដីផ្អែមត្រជាក់អាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្ដីសុខក្សេមក្សាន្ត ៕

**ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់ចង្រៃឧបទ្រពបានលុកលុយចូលក្នុងកិច្ចការងាររកស៊ី ដូច្នេះទោះជាបានប្រកបការងារអ្វីក៏ដោយ តែងប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕

**ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិត ស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្ដិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

**ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្ដិតមេដៃលើលិខិតស្នាមផ្សេងៗ ចូរពិនិត្យល្អិតល្អន់ ប្រយ័ត្នបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ទាល់តែចេះអត់ឱនឱ្យគ្នាទៅវិញទៅមក ទើបទទួលបានសេចក្ដីសុខ ៕

**ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ុនកំពុងតែដាក់ស្រោប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយប្រយ័ត្នភ្លាត់ស្នៀតអាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

**ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងក្រែងមានបងប្អូនញាតិមិត្តនាំរឿងក្ដៅក្រហាយមកឱ្យអាចនាំឱ្យមានអំពល់ទុក្ខដាក់ខ្លួន ព្រមទាំងអាចបង់ខាតទ្រព្យច្រើនទៀតផង ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមានតែភាពផ្អែមល្ហែមស្និទ្ធស្នាលដូចធម្មតា ៕

**ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែលប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនត្រូវឆាប់ត្រចៀកទន់ជឿសម្ដីញុះញង់របស់អ្នកផ្សេងឡើយទើបបានសុខកាយសប្បាយចិត្ត ៕

**ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះបើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕

**ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកច្រើន ។ ក្នុងរយៈពេលនេះ បើមានជន ចម្លែកយករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ឱ្យថូវថ្លៃយ៉ាងណាក្ដី ក៏មិនត្រូវទទួល ឬទិញយកដែរ ប្រយ័ត្ននឹងបានជាន់ដានចោរអាចោររួចខ្លួនម្ចាស់ជាប់គុក ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

**ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ដោយចង់មានចង់បានឱ្យហួសប្រមាណពេក ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានសុភមង្គលល្អណាស់នៅក្នុងគ្រួសារ ៕

**ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្ដី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្ដោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឱ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ីនឹងឆាប់និយាយត្រូវរ៉ូវ និង-មាន ការចុះសម្រុងនឹងគ្នា ។ ចំពោះអាជីវករនឹងមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ព្រមទាំង មានភោគផលកម្រៃហូរចូលច្រើនទៀតផង ៕

## សភាផេនស៊ីវេនា សង្គ្រោះបាន 3000នាក់

ដោយ : ខ្មែរប៉ុស្តិ៍

•••និយោជិកអ្នកធ្វើការរដ្ឋបាល និងសង្គមកិច្ច រួមទាំងក្រុមរក្សាសន្តិសុខរដ្ឋផេនស៊ីវេនា ប្រមាណ ៣០០០នាក់ បានរួចផុតពីគម្រោងបញ្ឈប់ការងារដែលបានប្រកាសតាំងពីខែមិថុនាមុនមក ដោយសារសមាជិកសភារដ្ឋនេះ ទើបនឹងយល់ស្របព្រមព្រៀងអនុម័តលើថវិកា ស្នើដោយអភិបាលរដ្ឋ អេដ រិនដិល កាលពីថ្ងៃ ព្រហស្បតិ៍ ទី១៧ កញ្ញានេះ ។

លោក អេដ រិនដិល

ថវិកាចំនួន ២៨ពាន់លានដុល្លារ បានសម្រេចដោយសភារដ្ឋម្ដងហើយ កាលពី ១១ ខែមុន តែអភិបាលរដ្ឋ បានប្រើអំណាច "វេតូ" ជំទាស់ ដោយពេលនោះ នៅខ្វះខាតប្រមាណ ១ពាន់លានទៀត ដើម្បីចៀសវាងការកាត់បន្ថយនូវបុគ្គលិកចំនួនប្រ-មាណ ៣០០០នាក់ ដែលក្នុងនោះមានក្រុមការងារយកសម្រាមក្រុង ក្រុមការងារសង្គមកិច្ច ក្រុមប៉ូលិសសន្តិសុខ ...។ល។ លើកនេះ សភារដ្ឋបានអនុញ្ញាតិឱ្យអភិបាលក្រុង ហ្វីឡាដែលហ្វៀ ម៉ាយកិលណាឌ័រ យកពន្ធលើទំនិញបន្ថែម ១% ដោយសង្ឃឹមថា នឹងរកថវិកាបន្ថែមជិត ៨០០លានដុល្លារ ដាក់ជូនរដ្ឋចំណាយក្នុងមួយឆ្នាំៗ បានគ្រប់គ្រាន់ ។

សេចក្ដីសម្រេចនេះ ត្រូវបានគេយល់ថា ពលរដ្ឋគ្រប់រូបនឹងធ្វើពលិកម្មលើតម្លៃទំនិញរបស់ខ្លួន ដើម្បីទប់ទល់នឹងវិបត្តិសេដ្ឋកិច្ចក្នុងស្រុក ឧទាហរណ៍ បើតម្លៃទំនិញកាលពីលើកមុន អ្នកទិញចំណាយ ៣៥០ ដុល្លារ ឥឡូវនេះ នឹងមានតម្លៃ ៣៥៣.៥ដុល្លារ តែប៉ុណ្ណោះ ៕

(តមកពីទំព័រទី ០៨)

## ការចរចាព្រំដែនរវាងខ្មែរ...

របស់ក្រសួងការបរទេសលោកនាយករដ្ឋមន្ត្រីសៀមបានស្នើសុំឱ្យអង្គប្រជុំវាយតម្លៃ ថាតើវាអាចមានផលវិបាកអ្វីខ្លះក្នុងការធ្វើវិសោធនកម្មមាត្រា 190 នៃរដ្ឋធម្មនុញ្ញដើម្បីដោះស្រាយជម្លោះព្រំដែនជាមួយកម្ពុជា ។ព័ត៌មាននេះត្រូវបានកាសែតបាងកកប៉ុស្តិ៍ផ្សព្វផ្សាយកាលពីថ្ងៃព្រហស្បតិ៍ ម្សិលមិញ ។

អ្នកនាំពាក្យរបស់ក្រសួងការបរទេសខ្មែរ លោក កុយ គួង បានបដិសេធមិនធ្វើអត្ថាធិប្បាយច្រើនទៅលើបំណងរបស់រដ្ឋាភិបាលសៀម ក្នុងការស្នើធ្វើវិសោធនកម្មមាត្រា 190 នៃរដ្ឋធម្មនុញ្ញនោះ ដោយលោកបានថ្លែងថា "យើងមិនដឹងថាគេវិសោធនកម្មរបៀបម៉េចផង" ។ យោងតាមការអះអាងរបស់លោក វ៉ា គឹមហុង មាត្រា 190 នៃរដ្ឋធម្មនុញ្ញសៀម ដែលចែងតម្រូវឱ្យមានការយល់ព្រមពីរដ្ឋសភាលើរាល់កិច្ចព្រមព្រៀងអន្តរ-ជាតិស្ដីពីទឹកដី ទើបតែមានក្រោយពេលព្រឹត្តការណ៍ទម្លាក់លោក ថាក់ស៊ីន ចេញពីអំណាចនេះទេ ។

កន្លងមករាល់ការចរចានៅគ្រប់កិរិតនៃក្របខណ្ឌរដ្ឋាភិបាលលើបញ្ហាខ្សែបន្ទាត់ព្រំដែន បានមានដំណើរការទៅមុខយ៉ាងយឺត ដោយសារតែភាគីសៀមត្រូវឆ្លងកាត់ការយល់ព្រមរបស់រដ្ឋសភារបស់គេនេះឯង ។ ត្រូវតែមានការយល់ព្រមពីរដ្ឋសភា

សភាសៀមអនុម័តឱ្យរដ្ឋាភិបាលខ្លួនចរចាបញ្ហាព្រំដែនជាមួយខ្មែរ

មុននឹងរដ្ឋាភិបាលមានសិទ្ធិមកចរចាជាមួយកម្ពុជា ហើយក៏ត្រូវមានការអនុម័តពីរដ្ឋសភាដែរ ទៅលើលទ្ធផលនៃការចរចាយ៉ាងណានោះ ។ជាក់ស្ដែង កំណត់ហេតុនៃកិច្ចប្រជុំរបស់គណៈកម្មការចម្រុះព្រំដែន (Joint Border Commission) ប៉ុន្មានលើកចុងក្រោយស្ដីពីការព្រមព្រៀងគ្នាលើបច្ចេក-ទេសវាស់វែងព្រំដែន ការរុករកបង្គោលព្រំដែនចាស់ក៏ដូចជាការបោះបង្គោលព្រំដែននៅលើតំបន់ខ្លះកំពុងតែត្រូវរង់ចាំការអនុម័តរបស់រដ្ឋសភាសៀម។ លោកឧបនាយករដ្ឋមន្ត្រី ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសខ្មែរបានប្រាប់អ្នកសារព័ត៌មានកាលពីថ្ងៃ អង្គារ ថា ឯកសារដែលត្រូវអនុម័តពីរដ្ឋសភាសៀម ស្ថិតនៅរបៀបវារៈទី 16 ឯណោះ។ ហើយបច្ចុប្បន្នរដ្ឋសភាសៀម ទើបពិភាក្សាដល់របៀបវារៈទី 6 ។

នៅឯប្រទេសសៀម នាយករដ្ឋមន្ត្រីសៀម អាប់ភីស៊ិត វេចាជីវ៉ា កំពុងតែបញ្ជាឱ្យរដ្ឋមន្ត្រីការបរទេសសៀមលោក កាស៊ិត ភិរម្យ ធ្វើការពន្យល់បំភ្លឺប្រជាពលរដ្ឋសៀម និងក្រុមប្រឆាំងថា ចរចាជាមួយកម្ពុជាអំពីជម្លោះព្រំដែនមិនបានធ្វើឱ្យសៀម បាត់បង់ទឹកដីខ្លួននោះទេ ។ ប្រមុខរដ្ឋាភិបាលសៀម ក៏បានបញ្ជាឱ្យប្រមុខការទូតសៀមចុះមកធ្វើទស្សនកិច្ចនៅក្បែរតំបន់ប្រាសាទព្រះវិហារខ្មែរផងដែរ ។ គឺជាដំណើរទស្សនកិច្ច ដែលលោក អាប់ភីស៊ិត ជឿថានឹងធ្វើឱ្យលោក កាស៊ិត ទទួលព័ត៌មានយ៉ាងច្បាស់ដោយខ្លួនឯង ។

ដំណឹងទាក់ទងនឹងសៀមដែរនោះ លោក កាស៊ិត ត្រូវបាននាយករដ្ឋមន្ត្រីរបស់ខ្លួនបញ្ជាឱ្យទៅកាន់តំបន់ប្រាសាទព្រះវិហារ ។

មតិរបស់អ្នកតាមដានពីស្ថានការនយោបាយព្រំដែនខ្មែរ-សៀមបានឱ្យយោបល់ថា បញ្ហាធំៗទាំង2 គឺបញ្ហាការប្រើប្រាស់ផែនទី និងការប្រើឈ្មោះប្រាសាទព្រះវិហារដែលភាគីទាំង2មានទស្សនៈផ្ទុយគ្នាដែលជាការរាំងខ្ទប់មិនឱ្យច្រកចរចាចេញរួច ។ ដូច្នេះគួរតែគណៈកម្មាធិការព្រំដែនប្រទេសទាំង2ត្រូវទម្លាយបញ្ហាធំៗនេះមុនពេលដែលប្រទេសទាំង2អាចប្រែក្លាយតំបន់ព្រំដែនរបស់ខ្លួនឱ្យទៅជាតំបន់សន្តិភាពទាំងស្រុង និងលែងមានទំនាស់គ្នាតទៅទៀត ។

គួរបញ្ជាក់ថា ការអនុម័តរបស់សភាសៀម បានធ្វើឡើងជាមួយនឹងការអនុម័តលើក្របខ័ណ្ឌចរចាព្រំដែនរវាងប្រទេសសៀម ជាមួយម៉ាឡេស៊ី, ឡាវ, ភូមា និងឥណ្ឌូណេស៊ី ផងដែរ ៕

(តមកពីទំព័រទី ០៣)

## ការពិតនៅលើអ្វីដែលគេហៅថា...

ចេញពីតំបន់ខាងកើតនេះហើយដែលកុម្មុយនិស្តយួនចូលទៅវាយប្រហារជារឿយៗ ទៅលើស្រុកយួនខាងត្បូង ដូចជាការវាយប្រហារមួយយ៉ាងធំនៅពេលបុណ្យចូលឆ្នាំ (Têt) ឆ្នាំ 1968 ជាដើម ។ អន្តរាគមន៍របស់អាមេរិកាំងនេះទៀត គឺធ្វើឡើងនៅក្នុងកម្រិតច្បាស់លាស់ មានកម្រិតពេលវេលា និងកម្រិតទំហំដី : ពីក្នុងរយៈពេល ពីរខែចាប់ពីថ្ងៃទី 30 ខែមេសា ដល់ថ្ងៃទី30 ខែមិថុនា ឆ្នាំ1970 ហើយក្នុងជម្រៅដីជិត30គីឡូម៉ែត្រប៉ុណ្ណោះ ។ ក្រោយពីនោះមកលែងមានកងទ័ពជើងគោកអាមេរិកាំងប្រតិបត្តិការនៅក្នុងស្រុកខ្មែរទៀតហើយ ។

ដូច្នេះមិនអាចមានចម្បាំងស៊ីវិលរវាងខ្មែរ និងខ្មែរនៅក្នុងស្រុកនាឆ្នាំ 1970 ទេ ដោយហេតុថា សម្ដេច សីហនុ គ្មានកងទ័ពនៅក្រោមបង្គាប់លោកទេ ក្រោយពេលដែលគេដកលោកចេញពីតំណែងនៅថ្ងៃទី18 ខែមីនា ។ ឯខ្មែរក្រហមវិញ នៅពេលនោះគេគ្មានទ័ពធំទេ ព្រោះចលនាគេត្រូវបានសម្ដេច សីហនុ រំលាយអស់ហើយក្នុងរយៈពេល3ឆ្នាំក្នុងក្របខណ្ឌនៃការកំចាត់បង្ក្រាបរបស់សម្ដេច សីហនុ ពីឆ្នាំ 1967-1969 ។

ដូច្នេះនៅឆ្នាំ 1970 ដល់ 1972 រហូតដល់ពេលចុះហត្ថលេខាលើកិច្ចព្រមព្រៀងនៅទីក្រុងប៉ារីសពីរឿងយួននៅថ្ងៃទី 27 ខែមករា ឆ្នាំ 1973 គឺមានតែទ័ពយួនកុម្មុយនិស្តប៉ុណ្ណោះទេដែលស្ថិតនៅចំពោះមុខទ័ពរដ្ឋាភិបាលខ្មែរ ។ រូបថត និងឯកសារជាច្រើនដែលបោះផ្សាយដោយក្រសួងឃោសនាការខ្មែរពេលនោះជាភស្តុតាងស្រាប់ (រូបថតខ្មោចសត្រូវ អាវុធ និងឯកសាររបស់សត្រូវ) ។ល។ គឺនៅពេលក្រោយពីកិច្ចព្រមព្រៀងនៅទីក្រុងប៉ារីសនេះទេ ដែលកងទ័ពខ្មែរក្រហមបង្ហាញវត្តមានជាមួយទ័ពយួននៅទីសមរភូមិ ។

មាត្រា20នៃកិច្ចព្រមព្រៀងនៅទីក្រុងប៉ារីសបានចែងថា ទ័ពបរទេសនានាត្រូវតែដកចេញពីដីខ្មែរ និងលាវ ។ គ្មាននរណាមួយមិនដឹងទេថាតើទ័ពបរទេសនោះជាទ័ពនៃប្រទេសណានោះ ។ ក៏ប៉ុន្តែទ័ពបរទេសនេះ មិនបានដកថយចេញពីស្រុកខ្មែរទេ គេគ្រាន់តែយកទ័ពខ្មែរក្រហមមកដាក់នៅពីមុខទ័ពគេប៉ុណ្ណោះ ។ ទ័ពខ្មែរក្រហមនេះដែលជាសម្ព័ន្ធមិត្តរបស់យួនហាណូយបានរង់ចាំរហូតជិត3ឆ្នាំ ទើបអាចបង្កើតបានជាទ័ពមួយនៅក្នុងតំបន់ខ្មែរដែលយួនយៀកកុង-យៀកមិញ បានរាតត្បាតក្នុងឆ្នាំ 1970 ។ បើប្រសិនណាវាមានចម្បាំងរវាងខ្មែរ និងខ្មែរកាប់សម្លាប់គ្នាឯងពាសពេញប្រទេស ជាពិសេសនៅរាជធានី និងទីក្រុងធំៗនោះហើយ ប៉ុន្តែគ្មានរឿងកាប់សម្លាប់ដូចនេះសោះ ។

ក្រោយពីកិច្ចព្រមព្រៀងទីក្រុងប៉ារីសក្នុងឆ្នាំ 1973-1974 ខ្មែរក្រហមដែលជាដៃជើងយួន និងបង្កើតដោយយួនកុម្មុយនិស្តមានចំនួនតិចតួចណាស់ មិនអាចធ្វើអ្វីបាននៅពេលនោះទេ បើគ្មានការគាំទ្រគ្រប់បែបយ៉ាង មានការដឹកជញ្ជូនគ្រឿងសព្វាវុធពីសំណាក់កងទ័ពយួន ដែលតាំងនៅក្នុងស្រុកខ្មែរដែលជាការបំពានលើមាត្រា20 នៃកិច្ចប្រជុំនៅទីក្រុងប៉ារីស ។

អ្នកកាសែតបរទេសដែលភាគច្រើនជាអ្នកកាសែតបស្ចិមប្រទេសប្រហែលជាង30នាក់បានបាត់ខ្លួននៅក្នុងស្រុកខ្មែរ ក្នុងរយៈពេល3ខែដំបូងដែលសង្គ្រាមបានចាប់ផ្ដើម ។ ប្រសិនបើមានសង្គ្រាមខ្មែរ និងខ្មែរពិតមែននោះ ការឃោសនាដែលអួតអាតថា គេជាទ័ពរបស់សម្ដេច សីហនុ នោះអាចនឹងមានផលប្រយោជន៍ច្រើនណាស់ បើសិនជាគេយកអ្នកកាសែតទាំងនោះមកធ្វើជាកសិណសាក្សីថា គ្មានទ័ពយៀកកុង និងយួនខាងជើងនៅស្រុកខ្មែរទេ ។

ផ្ទុយទៅវិញ គេគ្មានឃើញអ្នកកាសែតណាម្នាក់បានត្រឡប់មកវិញឡើយ ។ និយាយឱ្យខ្លីរឿងប្រឌិតថា មានចម្បាំងស៊ីវិលក្នុងស្រុករវាងខ្មែរ និងខ្មែរជារឿងមួយបង្កើតទាំងស្រុងពីសំណាក់យួនហាណូយ និងរណបរបស់គេ_គឺយៀកកុង ដើម្បីបំបិទបំបាំងអំពើឈ្លានពាននៃកម្លាំងទ័ពរបស់គេក្នុងស្រុកខ្មែរនៅឆ្នាំ 1970 តែប៉ុណ្ណោះ ។ សាក្សីដែលរំខានប្រយោជន៍គេដូចជាអ្នកកាសែតបរទេសទាំង 32 នាក់ ដែលបាត់ខ្លួននោះត្រូវគេសម្លាប់ចោលតែម្ដង ។ ជាអកុសលថែមទាំងមតិនៃបស្ចិមប្រទេស ត្រូវបានបណ្ដោយខ្លួនឱ្យមជ្ឈដ្ឋានសារព័ត៌មានធំៗបំភ័ន្តបាន ហើយជាញឹកញាប់ សារព័ត៌មានធំៗទាំងនោះតែងទោរទន់ស្រឡាញ់ អនុគ្រោះកុម្មុយនិស្តយួន ហើយប្រឆាំង "អ្នកចក្រពត្តិនិយម" ។ សព្វថ្ងៃការនិទានប្រឌិតនៅតែបន្តរហូត ។ រីឯការពិតជាប្រវត្តិសាស្ត្រដែលគេបានក្លែងបំភ័ន្តជាច្រើនឆ្នាំមកហើយនោះ គឺពិបាកកែផ្លាស់ប្ដូរឱ្យត្រឡប់មកតាមសភាពដើមឡើងវិញណាស់ ។ ក៏ប៉ុន្តែជាការសំខាន់ណាស់ សម្រាប់យុវជនយើងដែលត្រូវយល់ដឹងច្បាស់ពីប្រវត្តិសាស្ត្ររបស់ស្រុកខ្លួន ៕

(តមកពីទំព័រទី ១០)

## ក្រសួង DHS ដកកូនចេញពី...

ត្រូវបានក្រសួង DHS ដកអាណាព្យាបាលកូនចេញពីខ្លួន ដោយគ្មានចិត្តចង់ ខ្លះមិនដឹងថាមកពីហេតុអ្វីហើយ ក៏មិនដឹងថាកូនខ្លួនគេយកទៅដល់ទីណាទេ ។ សូភី មានទោសដោយសារកូនមិនចូលសាលា រីឯឪពុកម្ដាយខ្លះគ្មានទឹកក្ដៅ ទឹកត្រជាក់ឱ្យកូនប្រើ- ខ្លះទៀតមិនបានឱ្យថ្នាំកូនលេបឱ្យបានត្រឹមត្រូវ-ជាទូទៅឪពុកម្ដាយវាយកូនទាល់តែមានរបួសស្លាកស្នាម... ។ល។ ទាំងនេះ ត្រូវទទួលការដកកូនចេញពីម្ដាយឪពុកយ៉ាងគួរឱ្យស្ដាយ ។ សូភី បានខិតខំការពារខ្លួន ដោយចូលក្នុងកម្មវិធី ពង្រឹងកម្លាំងជាម្ដាយក្នុងការអប់រំកូន រីឯបូរ៉ាមី ក៏បានសន្យាថានឹងរកសាលារៀននារដូវក្ដៅនេះ ហើយខិតខំទៅរៀនឱ្យបានទៀតទាត់ ព្រោះមិនចង់ទៅរស់នៅឆ្ងាយពីម្ដាយខ្លួនទេ ហើយលក្ខខណ្ឌនេះ អ្នកស្រី ព័រគីន អាចទទួលយកបានថានឹងរាយការណ៍ទៅជូនចៅក្រមនៃតុលាការសាលារៀនបាន ។

បើចង់ដឹងបន្ថែម សូមសួររក **សំខុន**
ទូរស័ព្ទ : **(215) 751-1800 X 557**

(តមកពីទំព័រទី ១៣)

# ថ្ងៃបុណ្យនៃពួកប្រេត...

ធ្វើសេចក្ដីជូនដំណឹងដល់ពុទ្ធបរិស័ទចំណុះជើងវត្តដោយចែកជា 14វេន គឺថ្ងៃទី1ដល់14រោច ខែភទ្របទជាថ្ងៃកាន់បិណ្ឌ ។ ចំណែក ឯថ្ងៃទី15 គឺជាថ្ងៃបិណ្ឌរួម ឬថ្ងៃភ្ជុំបិណ្ឌដែលពុទ្ធបរិស័ទមកពីគ្រប់ទិសទីច្រើនជាងគេ ។

បាយបិណ្ឌ គឺជាបាយពំនូក ឬបាយដំណើបដែលគេបានចំអិន មានលាយខ្ទិះដូងផ្សំជាមួយគ្រឿងផ្សេងៗតាមការនិយមរបស់អ្នកស្រុក ដោយក្នុងបាយនោះមានផ្សំជាចេកចំណិត ចេកទុំ នំចិន នំអន្សម នំគម រួចច្របាច់ដាក់ចាន ឬផើងពាន រួចអុជធូបឧទ្ទិសកុសលឱ្យពួកប្រេត ។

បាយប្រភេទនេះគេធ្វើសម្រាប់ឧទ្ទិសកុសលពួក ប្រេត នរក អសុរកាយ ដែលចិញ្ចឹមជីវិតដោយសារកម្មផលចំហាយអាក្រក់ លុះត្រាតែបងប្អូនឧទ្ទិសកុសលឱ្យទើបបានឆ្អែត និងរួចផុតពីទុក្ខទោសទាំងនេះ ។

លោក សោម សេង អាចារ្យវត្តសិរីបទុមមង្គល ហៅវត្តឃ្មួញ នៅក្រុងភ្នំពេញ បានឱ្យដឹងថា សព្វថ្ងៃនេះពុទ្ធបរិស័ទបាននាំគ្នាមកបោះបាយបិណ្ឌនៅពេលទៀបភ្លឺយ៉ាងច្រើន ដែលក្នុងបោះបាយបិណ្ឌបណ្ដើរ និងឧទ្ទិសកុសលឱ្យញាតិមិត្តដែលស្លាប់ទៅសូមឱ្យមកទទួលនូវផលបុណ្យនេះ ។

លោកអាចារ្យ សោម សេង បន្តថា ការដែលអ្នកស្រុកនាំគ្នាទៅបោះបាយបិណ្ឌនៅពេលទៀបភ្លឺ ដោយសារតែពួកប្រេតខ្លាចពន្លឺថ្ងៃ ហើយរង់ចាំទទួលទានអាហារពីសាច់ញាតិ នៅទីងងឹតក្បែរបរិវេណវត្ត ឬជុំវិញព្រះវិហារ ។ ដូច្នេះ ហើយទើបជិតភ្លឺអ្នកស្រុកនាំគ្នាទៅបោះបាយបិណ្ឌដែលគេពូតតូចៗ ដោយពេលបោះគេសូត្របាលីឧទ្ទិសកុសលឱ្យដល់បុព្វការីជន ដែលបានចែកឋាន ឬដាក់លើដីឱ្យប្រេតទទួលទាន ។

ពិធីពូនភ្នំខ្សាច់

ជារៀងរាល់ព្រឹកព្រលឹមនៅតាមវត្តមានស្គរទូងស្គរឡើងជាសញ្ញាប្រាប់ដល់ព្រះសង្ឃ និងពុទ្ធបរិស័ទដល់ពេលសូត្រធម៌ឧទ្ទិសកុសលឱ្យពួកប្រេត និងរៀបចំបាយបិណ្ឌ ។ មុនពេលបោះបាយបិណ្ឌព្រះសង្ឃនិមន្តទៅសូត្រធម៌ក្នុងវិហារ រួចនិមន្តមកសាលាឆាន់វិញ ដោយនៅលើបាយបិណ្ឌមានធូបទាន ហើយអាចារ្យនាំស្រែកថា "អនុមោទនាលោកអើយ" ។ ចំណែកអ្នកបោះក៏នាំគ្នាស្រែកថា "សាធុ ! ចំនួន3ដង" ។

ចំណែកលោកព្រឹទ្ធាចារ្យ មៀច ប៊ុណ្ណ ទីប្រឹក្សាពុទ្ធសាសនបណ្ឌិត្យ បានឱ្យដឹងថា តាំងពីយូរលង់ណាស់មកហើយខ្មែរយើងមានជំនឿថា ពួកខ្មោចដែលត្រូវគេធ្វើទារុណកម្មកាលនៅរស់ ហើយត្រូវធ្លាក់ទៅកើតទីថោកទាប តែងទទួលទុក្ខទោសធ្ងន់ធ្ងរនៅឋាននរកមិនដែលឃើញពន្លឺថ្ងៃ គ្មានអាហារទទួលទាន គ្មានសំលៀកបំពាក់ រស់ដោយសារចំហាយកម្ម លុះត្រាតែមានបងប្អូនឧទ្ទិសកុសលឱ្យទើបផុតទុក្ខទោស ។

លោកព្រឹទ្ធាចារ្យ មៀច ប៊ុណ្ណ បានបន្តថា ចំពោះពួកប្រេតដែលដើររកសាច់ញាតិចំនួន 7វត្ត ហើយបើគ្មានបងប្អូនសាច់ញាតិសែនឱ្យទទួលទាននោះទេ ពួកគេក៏ជេរដាក់បណ្ដាសារឱ្យសាច់ញាតិវិនាសហិនហោចទ្រព្យសម្បត្តិ ជួបនឹងគ្រោះចង្រៃក្នុងក្រុមគ្រួសារ ។ ប៉ុន្តែ បើពួកប្រេតបានទទួលទានដែលបងប្អូនឧទ្ទិសឱ្យពួកគេនឹងរួចពីទុក្ខទោសបានទៅចាប់ជាតិជាថ្មី ព្រមទាំងឱ្យពរជ័យដល់ក្រុមគ្រួសារឱ្យចំរុងចម្រើនថែមទៀតផង ។

លោកព្រឹទ្ធាចារ្យ មៀច ប៊ុណ្ណ ក៏បានបញ្ជាក់ដែរថា បុណ្យភ្ជុំបិណ្ឌមិនត្រឹមតែឧទ្ទិសកុសលឱ្យពួកប្រេតជាញាតិសន្តានប៉ុណ្ណោះទេ គឺបានចូលរួមចំណែកលើកស្ទួយព្រះពុទ្ធសាសនាឱ្យកាន់តែរីកចម្រើន និងជាឱកាសឱ្យពុទ្ធបរិស័ទបានជួបជុំគ្នាដើម្បីពិភាក្សាពីរឿងការងារកសិកម្មទៀតផង ។ ចំណែកឯម្ចាស់ទានក៏ទទួលបានផលបុណ្យកុសលកាន់តែច្រើនមួយកំរិតថែមទៀតនៅពេលបច្ចុប្បន្ន និងទៅអនាគតជាតិ ។

រីឯលោកបណ្ឌិត អាំង ជូលាន អ្នកជំនាញផ្នែកធរណីវិទ្យាក៏បានមានប្រសាសន៍ទាក់ទងទៅនឹងបុណ្យដាក់បិណ្ឌនេះថា តាមធម្មតាមនុស្សដែលនៅរស់គាត់ពុំសូវទទួលទានបាយដំណើប ឬបាយ ពុំនូកនេះទេ ហើយក៏បោះបាយបិណ្ឌនេះវាពុំមែនជាអាហារភោជន៍ឡើយ ។ ប៉ុន្តែផ្ទុយទៅវិញបាយដំណើបដែលពុទ្ធបរិស័ទនាំគ្នាបោះ ហើយឧទ្ទិសកុសលឱ្យព្រលឹងពួកប្រេតអសុរកាយនេះ វាគឺតំណាងឱ្យក្ខន្ធទាំង5របស់មនុស្សដែលបែកធ្លាយ ហើយនៅសល់តែព្រលឹងរករូបមិនឃើញឱ្យឆាប់ចាប់កំណើតឡើងវិញ ។

លោកបណ្ឌិត អាំង ជូលាន បន្តថា ការដែលគេនាំគ្នាទៅបោះបាយបិណ្ឌនៅពេលយប់ជិតភ្លឺនោះវាពុំមែនមានន័យថា ពួកប្រេតខ្លាចពន្លឺថ្ងៃនោះទេ ខ្លាចពន្លឺថ្ងៃយ៉ាងម៉េច បើយើងនាំគ្នាអុចទៀនបំភ្លឺព្រោងព្រាតហើយនោះ ។ តាមពិតនោះខ្លឹមសារពិតប្រាកដនៃការបោះបាយបិណ្ឌពេលទៀបភ្លឺគឺគេចង់បញ្ជាក់ថា "ឱកាសចាប់ជាតិរបស់ពួកខ្មោចប្រេតនេះទៅក្នុងផ្ទៃម្ដាយដែលងងឹត គឺមានតែជិតភ្លឺប៉ុណ្ណោះ" ។ ហេតុដូច្នេះហើយទើបគេនាំគ្នាបោះបាយបិណ្ឌ នៅពេលទៀបភ្លឺធ្វើឱ្យអ្នកមិនយល់មួយចំនួនបកស្រាយខុសពីន័យដើម ។

នៅថ្ងៃដាក់បិណ្ឌនេះអ្នកស្រុកមានធ្វើបាយសម្លរួមគ្នានៅតាមវត្ត និងតាមផ្ទះរៀងៗខ្លួន មានវេចនំចេក នំគម នំអន្សម និងនំចិន ព្រមទាំងគ្រឿងភេសជ្ជៈ និងទេយ្យទានមួយចំនួនទៀតសម្រាប់ប្រគេនចំពោះព្រះសង្ឃតាមវេនរៀងៗខ្លួន ។

អ្នកស្រី លី មុយអេង រស់នៅទីក្រុងភ្នំពេញ បានឱ្យដឹងថា នៅក្នុងរដូវបុណ្យភ្ជុំបិណ្ឌម្ដងៗគាត់តែងតែទៅវត្តធ្វើបុណ្យទានឧទ្ទិសកុសលឱ្យជីដូនជីតាមិនដែលខកខាននោះទេ ។ លើសពីនេះទៀត អ្នកស្រីក៏បានផ្ញើលុយកាក់ជូនឪពុកម្ដាយនៅឯស្រុកកំណើតសម្រាប់ធ្វើបុណ្យលុះដល់ថ្ងៃភ្ជុំធំទើបទៅធ្វើបុណ្យនៅឯស្រុកកំណើតជួបជុំបងប្អូន និងសែនព្រេនតាមទំនៀមទម្លាប់ប្រពៃណីព្រះពុទ្ធសាសនា ។

អ្នកស្រី លី មុយអេង បានបន្តថា បុណ្យភ្ជុំបិណ្ឌនេះមានសារៈសំខាន់ខ្លាំងណាស់ដែលពុទ្ធបរិស័ទនាំគ្នាទៅវត្តធ្វើបុណ្យមិនដែលខកខានទេ សូម្បីតែបងប្អូនរបស់គាត់ដែលរស់នៅអាមេរិកក៏ពួកគាត់មកធ្វើបុណ្យដែរ ។ បើពួកគាត់មិនបានមកក៏ផ្ញើលុយកាក់សម្រាប់ធ្វើបុណ្យឧទ្ទិសកុសលឱ្យជីដូនជីតាមិនដែលខានឡើយ ។

ទាក់ទិនទៅនឹងប្រវត្តិនៃការដាក់បិណ្ឌនេះ បើតាមគម្ពីរសាសនា បានបញ្ជាក់ថា អស់រយៈកាលដ៏យូរលង់គ្រួសាររបស់ព្រះបាទពិម្ពិសារ បានធ្វើបុណ្យប៉ុន្តែទទួលទានមុនព្រះសង្ឃ លុះពេលស្លាប់ទៅកើតជាប្រេតរងទុក្ខវេទនា លំបាកគ្មានអាហារទទួលទាន ។ ពួកប្រេតទាំងអស់នោះបានរង់ចាំព្រះត្រាស់2អង្គកន្លងផុតទៅរហូតដល់ព្រះសមណគោត្តមបានត្រាស់ក៏នាំគ្នាមកសួរទៀតដើម្បីរកអាហារទទួលទាន ។

ព្រះសម្មាសម្ពុទ្ធបានត្រាស់ថា "ចាំព្រះបាទពិម្ពិសារ ជាញាតិរបស់អ្នកឱ្យទានដល់តថាគត នឹងញុំាងឱ្យអាហារនេះបានសម្រេចដល់អ្នកទាំងអស់គ្នា" ។ ពេលព្រះបាទ ពិម្ពិសារ ធ្វើបុណ្យយ៉ាងអធិកអធមហើយ ប៉ុន្តែមិនបានឧទ្ទិសឱ្យពួកប្រេតលុះយប់ឡើងពួកប្រេតក៏មកយំទ្រហឹងក្បែរបន្ទប់ព្រះអង្គទៀត ។

ព្រះបាទ ពិម្ពិសារ ឃើញហេតុភេទនេះក៏យាងទៅសួរព្រះបរមគ្រូ ហើយព្រះអង្គមានបន្ទូលថា "ពួកប្រេតជាសាច់ញាតិរបស់ព្រះអង្គត្រូវបានអាហារបរិភោគក្នុងសាសនាតថាគត" ។ ប៉ុន្តែពេលព្រះអង្គធ្វើបុណ្យមិនបានឧទ្ទិសកុសលឱ្យទើបមានឮសំឡេងស្រែកយំលាន់ឡើងបែបនេះ ។

ក្រោយពីព្រះបាទ ពិម្ពិសារ រៀបចំពិធីនេះ រួចឥទ្ធិពលព្រះពុទ្ធសាសនាក៏ជិតដាមក្នុងអារម្មណ៍ ពុទ្ធសាសនិកជារៀងរហូត ។ ចំណែកនៅប្រទេសកម្ពុជារៀបចំពិធីដាក់បិណ្ឌក្នុងរជ្ជកាលព្រះបាទអង្គឌួងនាសម័យឧដុង្គ ហើយបានចាក់ឫសសាយភាយដល់សព្វថ្ងៃនេះ ៕

# A.B.C MONEY TRANSACTION, INC



# ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



## តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកំរៃ | $4.50 | $5.50 |
| $200 | យកកំរៃ | $9.00 | $11.00 |
| $300 | យកកំរៃ | $13.50 | $16.50 |
| $500 | យកកំរៃ | $16.00 | $17.00 |
| $1000 | យកកំរៃ | $25.00 | $26.00 |
| $1500 | យកកំរៃ | $35.00 | $36.00 |
| $2000 | យកកំរៃ | $42.00 | $43.00 |
| $2200 | យកកំរៃ | $46.00 | $47.00 |



សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

### នៅរដ្ឋ VIRGINIA សូមទាក់ទង

**ABC MONEY TRANSATION ,INC.**
8 locations to serve you in Virginia

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**
- 4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**
- 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**
- 4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**
- 996 Dorchester Ave. Tel:617.825.9380
- 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**
- 2718 Nicollet Ave . S.- Ste. 102 B
- Tel : 612.871.4731
- 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**
- 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**
- 6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**
- 5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794
- 571 Adams Ave . Ave.#4 . Tel : 215.342.6623
- 1100 Washington Ave . -Lot C Unit 5 (E) Tel : 215.334.2900

**TEXAS**
- .1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461
- 2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817
- 5302 E . Belknap St.- Ste.D6 . Tel : 817.831.4836
- 3538 W . Walnut St. Tel : 972.272.2253
- 11205 Bellaire Blvd . Tel : 281.561.6600
- 10909 Scarsdale Blvd . Tel : 281.481.2700
- 13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINGTON STATE**
- 766 S.38th St,. Tel : 253.475.2847
- 3818 S.Graham St.-Ste. C Tel : 206.721.2070

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com